សៀវភៅទី 8
នេះជាឥស្លាម

سلسلة هذا إسلامي
( الكتاب الثامن )



# مُقتَطفَات مِنْ فِقهِ النِسَاء

# ក្បួនច្បាប់អនាម័យសំរាប់ស្ត្រី ពេលមានរដូវ និង សំរាលបុត្រ



مشروع طباعة وتوزيع الكتب الإسلامية
إهداء أهل الخير من دولة الكويت
التنفيذ / جمعية الإصلاح الاجتماعي ـ الكويت



بسم الله الرحمن الرحيم

# អារម្ភកថា

សាសនិកអ៊ីស្លាមទាំងឡាយជាទីស្រឡាញ់! នេះជាសមិទ្ធិផលថ្មីមួយទៀតដែលពួកយើងខ្ញុំជានិស្សិតកំពុងសិក្សានៅសាកលវិទ្យាល័យម៉ាឌីណះ ប្រទេសអារ៉ាប៊ីសាអូឌីតបានខិតខំព្យាយាម ដោយសហាការគ្នាដើម្បីប្រសូតនូវសមិទ្ធិផលថ្មីនេះជាជំនួយស្មារតីផ្នែកសាសនាអ៊ីស្លាម សម្រាប់មិត្ត អ្នកអានទាំងអស់គ្នា។

យើងខ្ញុំមានជំនឿថាមិត្តអ្នកអានមួយចំនួនពិតជាបានយល់ជ្រួតជ្រាបខ្លះហើយ ហើយកំពុងប្រតិបត្តិយ៉ាងយកចិត្តទុកដាក់។ រីឯមួយចំនួនទៀតកំពុងស្វែងយល់នៅឡើយ ពីកិច្ចការដែលទាក់ទងនឹងបញ្ហាឈាមរដូវ ឈាមនិហ្វាស និងឈាមអ៊ីសទីហាដ្ហស់ ដូចនេះហើយទើប ពួកយើងខ្ញុំទាំងអស់គ្នាបានមូលមតិគ្នាធ្វើការបកប្រែសៀវភៅស្ដីអំពីឈាម រដូវឈាមនីហ្វាស និងឈាមអ៊ីសទីហាដ្ហស់ជាភាសាខ្មែរនេះឡើង ដើម្បីអោយមានភាពងាយស្រួលក្នុងការសិក្សាស្វែងយល់បន្ថែមក្នុងគោលបំណងធ្វើការប្រតិ បត្តិឲ្យស្របតាមអាល់គួរអាន និងស៊ុណ្ណះរបស់ណាពីមូហាំម៉ាត់។

ក្នុងការផ្សព្វផ្សាយសៀវភៅនេះ យើងខ្ញុំគ្មានបំណងបម្រើផលប្រយោជន៍ឲ្យបក្សពួក ក្រុម ឬនិកាយណាមួយឡើយ ពោលគឺយើងខ្ញុំទាំងអស់គ្នាមានបំណងតែមួយគត់គឺបង្ហាញជូនមិត្តអ្នកអាននូវតថភាពដែលមាននៅក្នុងអាល់គួរអាន និងស៊ុណ្ណះរបស់ណាពីមូហាំម៉ាត់ដែលទាក់ទងទៅនឹងបញ្ហាឈាមរដូវ ឈាមនិហ្វាស ឈាមអ៊ីសទីហាដ្ហស់។ ជាមួយគ្នា នេះដែរការប្រកាន់យកតាមមាគ៌ានៃអ៊ីម៉ាំណាមួយដោយដាច់ខាត ឬការប្រកាន់យកតាមសាសនវិទូណាម្នាក់ដោយដាច់ខាត និងមិនព្រមសិក្សាស្វែងយល់បន្ថែមឲ្យល្អិតល្អន់ទេនោះ ក៏មិនមែនជាការប្រសើរនោះដែរ ពីព្រោះអ៊ីម៉ាំ

ម្នាក់ៗក្នុងចំណោមអ៊ីម៉ាំទាំងបួន សុទ្ធតែបានបន្សល់ទុកនូវពាក្យបណ្តាំដល់សាសនិកអ៊ីស្លាមទាំងអស់។ ពាក្យផ្តាំផ្ញើរទាំងនោះ យើងខ្ញុំបានដកស្រង់ចេញពីសៀវភៅហ្វាតាវ៉ាអ៊ិបនូតៃមីយ៉ះ ដែលមានខ្លឹមសារដូចខាងក្រោម ៖

➢ អ៊ីម៉ាំអាព្ហូហានីហ្វះបាននិយាយថា៖

**قَالَ الْإِمَامُ أَبُو حَنِيفَةَ: (إِذَا قُلْتُ قَوْلاً يُخَالِفُ كِتَابَ اللهِ وَخَبَرَ الرَّسُوْلِ صلى الله عليه وسلم فَاتْرُكُوا قَوْلِي)**

<u>មានន័យថា៖</u> ពេលណាខ្ញុំនិយាយពាក្យសម្តីណាមួយ ដែលប្រាសចាកពីអាល់គួរអាន និងស៊ុណ្ណះ ចូរអ្នកទាំងអស់គ្នាបោះបង់សម្តីខ្ញុំចោលចុះ។ លោកក៏បាននិយាយផងដែរថា៖

**فقد صح عن أبي حنيفة أنه قال: (إِذَا صَحَّ الْحَدِيثُ فَهُوَ مَذْهَبِي)□**

<u>មានន័យថា៖</u> នៅពេលណាដែលអ្នកទាំងអស់គ្នា បានជួបនូវហាឌីសត្រឹមត្រូវនោះហើយជាមាគ៌ា (ម៉ាហ្សហាប់) របស់ខ្ញុំដែរ។

➢ អ៊ីម៉ាំម៉ាលិកបាននិយាយថា៖

**قال الإمام مالك رحمه الله: (إِنَّمَا أَنَا بَشَرٌ أُخْطِئُ وَأُصِيبُ، فَانْظُرُوا فِي رَأْيِي، فَكُلُّ مَا وَافَقَ الْكِتَابَ وَالسُّنَّةَ فَخُذُوهُ، وَكُلُّ مَا لَمْ يُوَافِقِ الْكِتَابَ وَالسُّنَّةَ فَاتْرُكُوهُ)**

<u>មានន័យថា៖</u> ពិតណាស់រូបខ្ញុំជាមនុស្សលោករមែងខុស និងត្រូវដូចនេះចូរអ្នកទាំងអស់គ្នាសង្កេតមើលក្នុងទស្សនៈរបស់ខ្ញុំ រាល់អ្វីដែលសមស្របនឹងអាល់គួរអាន និងស៊ុណ្ណះណាពីយើងចូរអ្នកទាំងអស់គ្នាទទួលយកវាចុះ តែបើចំនុចណាដែលវាផ្ទុយពីអាល់គួរអាន និងស៊ុណ្ណះណាពីយើងចូរអ្នកទាំងអស់គ្នាបោះបង់វាចោលទៅ។

➢ អ៊ីម៉ាំស្ហាហ្វីអ៊ីបាននិយាយថា៖

قال الإمام الشافعي رحمه الله: (إِذَا وَجَدْتُمْ فِيْ كِتَابِيْ خِلَافَ سُنَّةِ رَسُوْلِ اللهِ صلى الله عليه وسلم فَقُوْلُوْا بِقَوْلِ رَسُوْلِ اللهِ ، وَهُوَ قَوْلِي)

<u>មានន័យថា៖</u> នៅពេលដែលអ្នកទាំងអស់គ្នាជួបប្រទះក្នុងសៀវភៅរបស់ខ្ញុំនូវអ្វីដែលផ្ទុយនឹងសុណ្ណះរ៉ស៊ូលុលឡោះ ចូរអ្នកទាំងអស់គ្នាប្រកាន់យកនូវប្រសាសន៍របស់រ៉ស៊ូលុលឡោះចុះ នោះហើយក៏ជាសម្តីរបស់ខ្ញុំដែរ។

- អ៊ីមុាំសើហ្វីអ៊ីបាននិយាយផងដែរថា៖

وقال: (إِذَا صَحَّ الْحَدِيْثُ فَهُوَ مَذْهَبِي)□

<u>មានន័យថា៖</u> នៅពេលណាអ្នកទាំងអស់គ្នាបានជួបនូវហាឌីសត្រឹមត្រូវនោះហើយជាមាគ៌ា (ម៉ាហ្សហាប់) របស់ខ្ញុំដែរ។

- អ៊ីមុាំអះម៉ាត់បាននិយាយថា៖

قال الإمام أحمد بن حنبل رحمه الله: (لَا تُقَلِّدْنِي وَلَا تُقَلِّدْمَالِكًا وَلَا الشَّافِعِيَّ وَلَا أَوْزَاعِيَّ وَلَا الثَّوْرِيَّ، وَخُذْ مِنْ حَيْثُ أَخَذُوْا....

<u>មានន័យថា:</u> ចូរអ្នកទាំងអស់គ្នាកុំអនុវត្តកិច្ចការសាសនាតាមខ្ញុំ តាមអ៊ីមុាំម៉ាលិក តាមអ៊ីមុាំសើហ្វីអ៊ី តាមលោកអាល់អៅហ្សាអ៊ី ឬលោកអាស្សៅរី ប៉ុន្តែអ្នកទាំងអស់គ្នាត្រូវអនុវត្តតាម កន្លែងដែលអ្នកទាំងនោះនាំមកអនុវត្ត (ពីគួរអាន និងស៊ុណ្ណះ) ។

- អ៊ីមុាំអះម៉ាត់បាននិយាយផងដែរថា៖

وقال: (مَنْ رَدَّ حَدِيْثَ رَسُوْلِ اللهِ صلى الله عليه وسلم فَهُوَ عَلَى شَفَا هَلَكَةٍ)□

<u>មានន័យថា:</u> ជនណាបានបោះបង់ស៊ុណ្ណះរបស់រ៉ស៊ូលុលឡោះជននោះស្ថិតនៅមាត់រណ្តៅនៃសេចក្តីអន្តរាយ។

ជាទីបញ្ចប់ យើងខ្ញុំទាំងអស់គ្នាជាអ្នកប្រែសម្រួល អ្នកត្រួតពិនិត្យ និងសហាសេវិកដែលបានរៀបចំនេះ សូមបួងសួងពីអស់ឡោះជាម្ចាស់ សូមទ្រង់បើកចំហរនូវមាគ៌ាដ៏ត្រឹមត្រូវ និងតម្រង់ពួកយើងទាំងអស់គ្នា ព្រមទាំងមិត្តអ្នកអាន ទៅកាន់ផ្លូវជោគជ័យ ប្រកបដោយការអាណិតអាសូរអំពីអល់ឡោះជាម្ចាស់នៃពិភពលោកទាំងឡាយ។

យើងខ្ញុំរង់ចាំទទួលការរិះគន់ ដើម្បីស្តាបនានូវកំហុសឆ្គងដោយអចេតនា ពីសំណាក់មិត្តអ្នកអានគ្រប់ពេលវេលា។

ក្រុមអ្នកប្រែសម្រួល ថ្ងៃទី ១៥ ខែកក្កដា ឆ្នាំ២០០២

# ជំពូកទី១

## ឈាមរដូវ (ហេដ) និងហេតុផលវា

**ពន្យល់ពាក្យ** ហេដ៖

- ហេដជាលក្ខណៈភាសាមានន័យថា ការហូរនៃវត្ថុរាវមួយ។
- ហេដ ជាលក្ខណៈច្បាប់មានន័យថា គឺជាឈាមដែលកើតមានចំពោះស្រ្តី តាមធម្មជាតិ គ្មានមូលហេតុ តែមានរយៈពេលជាក់លាក់ ពោលគឺវាជាឈាមដែលកើតមានពីធម្មជាតិមិនមែនកើតឡើងដោយសារជំងឺ ដំបៅ រលូតកូន ឬឆ្លងទន្លេនោះឡើយ។ ទោះបីជាឈាមដែលកើតចេញពីធម្មជាតិក៏ដោយ ក៏វាមានលក្ខណៈខុសៗគ្នាអាស្រ័យទៅតាមស្ថានភាពតំបន់ និងភូមិសាស្រ្តដែលស្រ្តីទាំងនោះរស់នៅ។

**ហេតុផលនៃការមករដូវ៖**

អល់ឡោះជាម្ចាស់បានបង្កើតឲ្យស្ត្រីមានឈាមរដូវនេះគឺមានហេតុផលជាច្រើនដូចជា ពេលស្ត្រីមានផ្ទៃពោះឈាមរដូវនឹងក្លាយជាអាហារសម្រាប់ចិញ្ចឹមទារកតាមរយៈទងសុក។ ដូច្នេះហើយទើបបានជាពេលកំពុងមានផ្ទៃពោះ និងបំបៅកូនរយៈពេលដំបូង គេកម្រនឹងឃើញស្ត្រីមករដូវណាស់។

៙៙❋៙៙

# ជំពូក២

# ការមានឈាមរដូវ និងរយៈពេលរបស់វា

បំណាកស្រាយក្នុងជំពូកនេះចែកចេញជាពីរផ្នែក៖

## 1. អាយុរបស់ស្ត្រីដែលអាចមានរដូវៈ

តាមធម្មតាស្ត្រីភាគច្រើនមានឈាមរដូវ ក្នុងចន្លោះអាយុចាប់ពី12ឆ្នាំ ទៅ 50ឆ្នាំជួនកាលស្ត្រីអាចមានឈាមរដូវមុន ឬក្រោយចន្លោះពេលខាងលើនេះ អាស្រ័យទៅតាមស្ថានភាពតំបន់ និងភូមិសាស្ត្រដែលស្ត្រីទាំងនោះរស់នៅ។

សាសនវិទូអ៊ីស្លាមមានការខ្វែងយោបល់គ្នា ចំពោះអាយុដែលអាចមានឈាមរដូវនេះ។ វាមានការកំណត់ជាក់លាក់ ពោលគឺ ស្ត្រីមិនអាចមានមុន ឬក្រោយការកំណត់នោះទេហើយឈាមដែលកើតឡើងចំពោះស្ត្រីក្នុងរយៈពេលមុន និងក្រោយការកំណត់នេះ តើវាជាឈាមជម្ងឺ មិនមែនជាឈាមរដូវ ឬយ៉ាងណា? ត្រង់ចំនុចនេះ សាសនវិទូ អាល់–ឌ៉ើរ៉មី (الدارمي) បានច្រានចោលនូវទស្សនៈខ្វែងគ្នាខាងលើ ហើយបានបញ្ចេញជាទស្សនៈឯករាជ្យមួយ ដោយពោលថា "*សម្រាប់ខ្ញុំ ទស្សនៈទាំងនេះមិនត្រឹមត្រូវនោះទេ ពីព្រោះក្នុងបញ្ហានេះ គេផ្តោតតែទៅលើឈាមរដូវ បើទោះជាមានក្នុងកម្រិតណាមានលក្ខណៈបែបណានិងស្ថិតក្នុងអាយុប៉ុន្មានក៏ដោយ ក៏គេចាត់ទុកថាវាជាឈាមរដូវដែរ*"។

ការលើកឡើងរបស់សាសនវិទូ អាល់–ខ្ឌើរ៉មី ជាទស្សនៈត្រឹមត្រូវ និងសមហេតុផលហើយក៏ជាជម្រើសរបស់សាសនវិទូអ៊ិបនូតៃមីយ៉ះផងដែរ។ ដូច្នេះ ស្ត្រីមករដូវ គឺជាស្ត្រីដែលមានឈាមរដូវដោយពុំចាំបាច់កំណត់អាយុ ទោះបីស្ត្រីនោះមានអាយុតិចជាង 9ឆ្នាំ ឬលើសពី50ឆ្នាំក៏ដោយចុះ ពីព្រោះយោងទៅតាមច្បាប់ដែលមានចែងក្នុងគម្ពីរអាល់គួរអាន និងស៊ុណ្ណះរបស់ណាពីមូហាំម៉ាត់ដែលបានកំណត់ថាៈ ករណីឈាមរដូវនេះគេកំណត់ទៅលើការមានឈាមរដូវពុំមែនកំណត់លើអាយុនោះទេ។ ដូច្នេះគេចាត់ទុកថាស្ត្រីមករដូវគឺអាស្រ័យលើឈាមរដូវពុំមែនអាស្រ័យលើអាយុរបស់ស្ត្រីដូចដែលពួកសាសនវិទូមួយចំនួនបានកំណត់នោះទេ។ ព្រោះការកំណត់អាយុនោះ គឺពុំមានអំណះអំណាងទាំងនៅក្នុងគម្ពីរ និងស៊ុណ្ណះរបស់ណាពីមូហាំម៉ាត់ឡើយ។

**2. រយៈពេលនៃការមានឈាមរដូវៈ**

សាសនវិទូអ៊ីស្លាមមានការខ្វែងយោបល់គ្នាជាច្រើន គឺរហូតមានទៅដល់ 6 ឬ 7 ទស្សនៈក្នុងការដេញដោលលើបញ្ហានេះ។ ចំពោះសាសនវិទូ អ៊ិបនូ អាល់–មុនហ្សៀ (ابن المنذر) បានលើកឡើងថា *"មានសាសនវិទូអ៊ីស្លាមមួយចំនួនយល់ឃើញថា សម្រាប់ឈាមរដូវពុំមានការកំណត់ចំនួនថ្ងៃ តិច ឬច្រើននោះទេ។ ខ្ញុំក៏យល់ថាទស្សនៈនេះស្របទៅនឹងទស្សនៈវិទូ អាល់–ខ្ឌើរ៉មី ហើយក៏ជាជម្រើសរបស់សាសនវិទូ ស្ហៃខខុលអ៊ីស្លាម អ៊ិបនូតៃមីយ៉ះ ផងដែរ "* ។

ការអះអាងខាងលើជាការត្រឹមត្រូវ ដោយហេតុថាទស្សនៈរបស់លោក ឆ្លុះបញ្ចាំងនៅក្នុងគម្ពីរអាល់គួរអាន និងស៊ុណ្ណះរបស់ណាពីមូហាំម៉ាត់ និងតាមសភាពជាក់ស្តែង។ ដូចអល់ឡោះបានមានបន្ទូលថា៖

**(وَيَسْئَلُوْنَكَ عَنِ الْمَحِيْضِ قُلْ هُوَ أَذًى فَاعْتَزِلُوا النِّسَاءَ فِى الْمَحِيْضِ وَلاَ تَقْرَبُوْهُنَّ حَتَّى يَطْهُرْنَ)** *سورة البقرة آية* ***222***

*មានន័យថា៖ "ពួកគេនឹងសួរអ្នក (មូហាំម៉ាត់) អំពីការមករដូវ ចូរឆ្លើយថាវាជាអាហ្សា ដូច្នេះចូរពួកអ្នកជៀសវាងការរួមសង្វាសជាមួយប្រពន្ធ ខណៈពេលនាងមករដូវ លុះត្រាណាពួកនាងជ្រះស្អាត (បានងូតទឹកសំអាតខ្លួន)"។*

- ***អាហ្សា*** (أذى) ជារោគដែលនាំឲ្យមានគ្រោះថ្នាក់ដល់ស្វាមីនិងភរិយាដែលរួមសង្វាសជាមួយគ្នា ខណៈដែលនាងមករដូវ។បន្ទូលខាងលើបានសេចក្តីថា រយៈពេលនៃឈាមរដូវយូរ ឬឆាប់អាស្រ័យលើការអស់រដូវរបស់ស្ត្រី ទ្រង់ពុំបានកំណត់រយៈពេល 1ថ្ងៃ 1យប់ 3ថ្ងៃ ឬ 15ថ្ងៃនោះឡើយ។ ដូច្នេះបញ្ជាក់ឲ្យឃើញថា: មូលហេតុនៃច្បាប់គឺ ការមករដូវ ឬគ្មានពោលគឺពេលណាមានឈាមរដូវច្បាប់ក៏កើតមាន និងពេលណាវាជ្រះស្អាតពីឈាមរដូវច្បាប់ក៏បញ្ចប់ទៅវិញដែរ។ ការបកស្រាយរបស់សាសនវិទូអ៊ីមុាំមូស្លីមដកស្រង់ចេញពីប្រសាសន៍របស់រ៉ស៊ូលមូហាំម៉ាត់ ដែលលោកបានមានប្រសាសន៍ទៅកាន់អាអ៊ីសះប្រពន្ធរបស់លោកខណៈពេលដែលអ្នកស្រីមករដូវចំពេលកំពុងកាន់តំណមអ៊ុមរ៉ោះថា:

**(أَنَّ النَّبِيَّ قَالَ لِعَائِشَةَ وَقَدْ حَاضَتْ وَهِيَ مُحْرِمَةٌ بِالْعُمْرَةِ اِفْعَلِيْ مَا يَفْعَلُ الْحَاجُّ غَيْرَ أَنْ لاَ تَطُوْفِيْ بِالْبَيْتِ حَتَّى تَطْهُرِيْ قَالَتْ فَلَمَّا كَانَ يَوْمُ النَّحْرِ طَهُرْتُ.)**

មានន័យថា៖ *"ចូរអ្នកធ្វើនូវអ្វីដែលបណ្ដាអ្នកធ្វើហាជ្ជីកំពុងធ្វើតែកុំដើរតវ៉ាហ្វជុំវិញកៈអ្ពះ (كعبة) ឲ្យសោះ លុះត្រាតែអ្នកបានជ្រះស្អាតពីឈាមរដូវសិន "* ។ អាអ៊ីសះនិយាយថា នៅថ្ងៃពិឃាតសត្វ (يوم النحر) ត្រូវនឹងថ្ងៃទី 10 ខែហ្ស៊ុលហិជ្ជះ ខ្ញុំបានជ្រះស្អាតពីឈាមរដូវ។ ណាពីមូហាំម៉ាត់បានមានប្រសាសន៍ទៀតថាៈ

**(أَنَّ النَّبِيَّ قَالَ لَهَا: اِنْتَظِرِيْ فَإِذَا طَهُرْتِ فَاخْرُجِيْ إِلَى التَّنْعِيْمِ)**

មានន័យថា៖ *ណាពីបានមានប្រសាសន៍ទៅកាន់ប្រពន្ធលោកថា "ចូរអ្នករង់ចាំរហូតដល់ជ្រះស្អាតពីឈាមរដូវ អ្នកអាចចេញទៅកាន់តំបន់តាន់អ៊ីម[1] ដើម្បីបំពេញការអ៊ុំរ៉ោះ"*។

ដូច្នេះប្រសាសន៍ទាំងពីរខាងលើរបស់ណាពីមូហាំម៉ាត់ ឆ្លុះបញ្ចាំងឲ្យឃើញថារយៈពេលនៃការមករដូវរបស់ស្ត្រីពុំមានការកំណត់ច្បាស់លាស់នោះទេ ពោលគឺអាស្រ័យទៅលើរយៈពេលយូរ ឬឆាប់ដែលស្ត្រីនោះជ្រះស្អាតពីឈាមរដូវប៉ុណ្ណោះ។ ម្យ៉ាងវិញទៀតអាហ្សានិងការមករដូវកើតមកព្រមជាមួយគ្នា តាំងពីថ្ងៃដំបូង រហូតដល់ថ្ងៃជ្រះស្អាតពីឈាមរដូវ ពុំមានការបែងចែកនិងវែកញែករវាងថ្ងៃនីមួ- យៗនោះឡើយ។

[1] ឈ្មោះកន្លែងមួយនៅទីក្រុងឡាមិក(ម៉ាក្កះ)នៅខាងក្រៅទឹកដីពិសិដ្ឋ។

លើសពីនេះទៅទៀតចំពោះទស្សនៈខ្វែងគ្នា រវាងពួកសាសនវិទូ អំពីបញ្ហាកំណត់រយៈពេលមករដូវ នោះពុំមានអំណះអំណាងច្បាស់លាស់ ដើម្បីគាំទ្រទស្សនៈរបស់ពួកគេនោះទេ ពីព្រោះគំនិតយល់ឃើញរបស់ពួកគេអាចត្រូវ អាចខុស មិនអាចយកមកធ្វើជាគោលបានឡើយ មានតែដំណោះស្រាយមួយគត់ គឺវិលទៅរកគម្ពីរអាល់គួរអាន និងស៊ុណ្ណះរបស់ណាពីមូហាំម៉ាត់ តែប៉ុណ្ណោះ។ សេចក្តីដូចដែលបានលើកឡើងខាងលើបង្ហាញឲ្យឃើញថា ឈាមរដូវដែលពុំមានរយៈពេលកំណត់សេចក្តី ដូចដែលបានលើកឡើងខាងលើបង្ហាញឲ្យឃើញថា ឈាមរដូវដែលពុំមានរយៈពេលកំណត់ច្បាស់លាស់ គឺជាទស្សនៈមួយដែលសមហេតុផល និងត្រឹមត្រូវ។ ដូចនេះស្ត្រីមករដូវគឺជាស្ត្រីដែលមានឈាមរដូវហូរមកដោយពុំគិតពីអាយុ និងរយៈពេលកំណត់ណាមួយឡើយ។ លើកលែងតែឈាមនោះហូរជាប់មិនដាច់ហើយវាបាត់ទៅវិញក្នុងរយៈពេលខ្លីដូចជាបាត់តែមួយថ្ងៃ ឬពីរថ្ងៃក្នុងមួយខែ។ ឈាមដែលមានលក្ខណៈដូចបានរៀបរាប់នេះគេហៅថាឈាមជម្ងឺ ជាភាសាអារ៉ាប់ហៅថាអ៊ីស្ទីហាឧស់។

៙៙✻៚៚

**ខាងក្រោមនេះជាបំណកស្រាយពីឈាមជម្ងឺ (អ៊ីស្ទីហាឧស់):**

សាសនវិទូ ស្ហេខុលអ៊ីស្លាម អ៊ិបនូ តៃមីយ៉ះ បាននិយាយថា៖ ជាការពិតណាស់ ឈាមដែលហូរចេញពីស្បូនស្ត្រី គឺជាឈាមរដូវ លុះត្រាតែរោគសញ្ញាអ្វីមួយដែលបញ្ជាក់ថា ឈាមនោះមិនមែនឈាមរដូវ ទើបគេហៅថាឈាមជម្ងឺ ។

ទស្សនៈនេះងាយស្រួលក្នុងការអនុវត្ត ដែលកំណត់រយៈពេលមករដូវរបស់ស្ត្រី។ មិនតែប៉ុណ្ណោះសាសនាអ៊ីស្លាមបានបង្កើតភាពងាយស្រួល និងផ្តល់ជម្រើសការអនុវត្តបែបងាយៗដល់អ៊ីស្លាមសាសនិក។ ដូចនេះ យើងគួរគប្បីជ្រើសរើស ការអនុវត្តណាដែលមានភាពងាយស្រួល និងមិនបង្កភាពស្មុគ្រស្មាញដល់ខ្លួន។
ដូចអល់ឡោះបានមានបន្ទូលថា:

**(وَمَا جَعَلَ عَلَيْكُمْ فِى الدِّيْنِ مِنْ حَرَجٍ) سورة الحج، آية 78**

<u>មានន័យថា៖</u>*“អល់ឡោះមិនដាក់បន្ទុកធ្ងន់ទៅលើពួកអ្នកក្នុងកិច្ចសាសនានោះឡើយ”* ។

**រ៉សូលមូហាំម៉ាត់បានមានប្រសាសថា:**

**(قَالَ صَلَّى اللهُ عَلَيْهِ وَسَلَّمَ: إِنَّ الدِّيْنَ يُسْرٌ وَلَنْ يُّشَادَّ الدِّيْنَ أَحَدٌ إِلاَّ غَلَبَهُ فَسَدِّدُوْا وَقَارِبُوْا وَأَبْشِرُوْا)**

**رواه البخاري**

<u>មានន័យថា៖</u> *“ពិតណាស់ អ៊ីស្លាមជាសាសនាងាយស្រួល គ្មានជនណាម្នាក់ បង្កើតការលំបាកស្មុគ្រស្មាញបានឡើយ (ប្រសិនបើមានដូច្នោះមែន) ជននោះនឹងត្រូវបរាជ័យ”* ។ ដូច្នេះ ចូរពួកអ្នកទូន្មានគ្នារួបរួមសាមគ្គី និងផ្សព្វផ្សាយដំណឹងល្អៗចំពោះគ្នាទៅវិញទៅមក។
ណាពីមូហាំម៉ាត់ តែងប្រកាន់យកការអនុវត្តងាយស្រួល ដរាបណាប្រការនេះមិនមែនជាអំពើបាបទេនោះ។ បើអល់ឡោះដាក់ឲ្យលោក

ជ្រើសយកជម្រើសមួយ ក្នុងចំណោមកិច្ចការពីរ គឺលោកជ្រើសយកកិច្ចការណាដែលងាយស្រួល។

៙៙❋៙៙

## ស្ត្រីមានគភ៌ និងឈាមរដូវ

តាមធម្មតា ស្ត្រីមានផ្ទៃពោះរមែងបាត់រដូវ។ អ៊ីម៉ាំ អះម៉ាត់ ហាំពាល់បាននិយាយថា៖ គេអាចដឹងថាស្ត្រីមានផ្ទៃពោះ ដោយសារការបាត់រដូវ។ ចំពោះស្ត្រីមានផ្ទៃពោះហើយមានធ្លាក់ឈាមមុនពេលឆ្លងទន្លេបន្តិច ដូចជាមុនពីរ បីថ្ងៃ ព្រមទាំងឈឺពោះផង នោះគេហៅថាឈាមឆ្លងទន្លេ (នីហ្វាស)។

បើសិនជាមានឈាមមុនឆ្លងទន្លេរយៈពេលយូរ ឬឆាប់ និងពុំមានការឈឺពោះទេនោះ ពុំមែនជាឈាមឆ្លងទន្លេនោះឡើយ ។ ក្នុងករណីនេះ ពុំមានការវែកញែកឲ្យច្បាស់លាស់ថាតើវាជាឈាមជម្ងឺឬឈាមរដូវនោះទេ? នៅក្នុងករណីនេះ ពួកសាសនវិទូមានការខ្វែងយោបល់គ្នា។ តាមធម្មតាឈាមនោះគេចាត់ទុកថា ជាឈាមរដូវដែលកើតមានចំពោះស្ត្រី ជាប្រក្រតីពុំមានមូលហេតុ ឬជម្ងឺដែលនាំឲ្យឈាមនោះធ្លាក់មកឡើយ។ ព្រោះនៅក្នុងគម្ពីរអាល់គួរអានពុំបានបញ្ជាក់ថា៖ ស្ត្រីមានគភ៌មិនអាចមានឈាមដូវនោះទេ នេះជានិកាយអ៊ីម៉ាំ

ម៉ាលីគី សាហ្វីអ៊ី និងជាជម្រើសរបស់សាសនវិទូ ស្នេខុលអ៊ីស្លាមអ៊ីបនូតែមីយ៉ះផងដែរ។ យោងតាមការបកស្រាយខាងលើ យើងអាចសន្និដ្ឋានបានថា ***គ្រប់ស្ត្រីដែលមានឈាមរដូវ ទាំងមាន និងគ្មានផ្ទៃពោះ គេចាត់ទុកថាស្ត្រីនោះមករដូវ*** លើកលែងតែពីរករណីដូចខាងក្រោម៖

➢ **ការលែងលះ ៖** នៅក្នុងសាសនាអ៊ីស្លាម គេបានដាក់ច្បាប់បំរាមការលែងលះប្រពន្ធ ពេលនាងកំពុងមានរដូវដែលមិនទាន់មានផ្ទៃពោះ តែបើសិនជានាងមករដូវ ខណៈពេលនាងមានផ្ទៃពោះនោះ ច្បាប់មិនហាមប្រាមចំពោះការលែងលះនោះឡើយ។ ព្រោះថាការលែងលះពេលមករដូវ ដែលមិនទាន់មានផ្ទៃពោះនោះ គឺខុសនឹងបញ្ញត្តិច្បាប់ដែលបានចែងនៅក្នុងគម្ពីរអាល់គួរអាន។ អល់ឡោះជាម្ចាស់បានមានបន្ទូលថា៖

**(فَطَلِّقُوْهُنَّ لِعِدَّتِهِنَّ...) سورة الطلاق 1**

<u>មានន័យថា</u>៖ *ចូរពួកអ្នកធ្វើការលែងលះប្រពន្ធ ក្នុងរយៈពេលរង់ចាំអ៊ីដឌ្ហះ[2] របស់ពួកនាងចុះ* ។

ចំណែកការលែងលះប្រពន្ធពេលមានឈាមរដូវ ខណៈពេលដែលនាងកំពុងមានផ្ទៃពោះនោះ ពុំមានការហាមប្រាមទេ ព្រោះការលែងលះពេលនាងមានផ្ទៃពោះ គឺជាការលែងលះមួយស្របច្បាប់ក្នុងពេលរង់ចាំអ៊ីដឌ្ហះ។ ដូច្នេះច្បាប់អ៊ីស្លាម បានអនុញ្ញាតឲ្យលែងលះប្រពន្ធខណៈពេលដែលនាងមានផ្ទៃពោះ ទោះក្រោយការរួមសង្វាសហើយ

---

[2] អ៊ីដឌ្ហះៈជារយៈពេលរង់ចាំការជ្រះស្អាតពីឈាមររដូវ និងមិនទាន់រួមភេទជាមួយនាង។

ក៏ដោយចុះ។ ផ្ទុយទៅវិញ ចំពោះស្ត្រីដែលមិនទាន់មានផ្ទៃពោះមុនធ្វើការលែងលះត្រូវរង់ចាំរយៈពេលជ្រះស្អាតជាមុនសិន។

➢ **រយៈពេលរង់ចាំឲ្យផុតអ៊ិដឌះ** (العدة)

រយៈពេលរង់ចាំអ៊ិដឌះ ដែលអ៊ិស្លាមបានកំណត់ តម្រូវឲ្យភាគីទាំងពីរ ប្តីនិងប្រពន្ធប្រកាន់យ៉ាងខ្ជាប់ខ្ជួន មុននិងក្រោយពេលលែងលះគ្នា ឬក្រោយពេលប្តីស្លាប់។ រយៈពេលរង់ចាំអ៊ិដឌះរបស់ស្ត្រីមានផ្ទៃពោះ គឺបន្ទាប់ពីនាងឆ្លងទន្លេរួច។

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា៖

**(وَأُوْلاَتُ الْأَحْمَالِ أَجَلُهُنَّ أَنْ يَضَعْنَ حَمْلَهُنَّ)**

**سورة الطلاق 4**

<u>មានន័យថា</u>៖ *ស្ត្រីដែលមានផ្ទៃពោះ រយៈពេលរង់ចាំរបស់ពួកនាងគឺបន្ទាប់ពីឆ្លងទន្លេរួច ។*

៙៙*៙៙

---

**ជំពូកទី ៣**

**ហេតុការណ៍ចែជន្យដែលអាចកើតមានចំពោះស្ត្រីមករដូវ**

ករណីនេះកើតមានចំពោះស្ត្រីដែលមានរដូវអាចមានច្រើនសណ្ឋាន៖

1. **ការលើសខ្វះចំនួនថ្ងៃ:** ឧទាហរណ៍ថា តាមធម្មតាស្ត្រីម្នាក់ធ្លាប់មករដូវរយៈពេលប្រាំមួយថ្ងៃ តែមានពេលខ្លះធ្លាក់ឈាម

រហូតដល់ថ្ងៃទីប្រាំពីរ ឬនាងធ្លាប់មករដូវរយៈពេលប្រាំពីរថ្ងៃ បន្ទាប់មកថយមកនៅត្រឹមតែប្រាំមួយថ្ងៃវិញ។

2. **រដូវមិនទៀង:** តាមធម្មតាស្ត្រីម្នាក់ធ្លាប់មានរដូវ នៅចុងខែ ស្រាប់តែពេលខ្លះមករដូវនៅដើមខែ ឬផ្ទុយមកវិញ។

សាសនវិទូអ៊ិស្លាមមានការខ្វែងយោបល់គ្នាក្នុងករណីទាំងពីរខាងលើ។ តែអ្វីដែលត្រឹមត្រូវនោះ គឺគេមិនបានកំណត់ចំនួនថ្ងៃ ឬពេលចាប់ផ្ដើមមករដូវនោះឡើយ។ ពេលណានាងចាប់ផ្ដើមមករដូវ ពេលនោះគេចាត់ទុកថានាងមករដូវ ហើយពេលណាដែលនាងបាត់រដូវជ្រះស្អាតពីឈាមរដូវ ពេលនោះគេហៅថាស្ត្រីជ្រះស្អាតពីរដូវ។ នេះជានិកាយ អ៊ីម៉ាំ សាហ្វ៊ីអ៊ី និងជាសជម្រើសរបស់សាសនវិទូ អ៊ីបនូ ទៃមីយ៉ះ។

3. **ឈាមមានសភាពពណ៌ក្រហមស្រាល និងល្អក់:**

ចំពោះស្ត្រីដែលធ្លាក់ឈាមមានសភាពពណ៌ក្រហមស្រាល ដូចទឹករងៃ ឬឈាមល្អក់ក្រហមស្រាលលាយពណ៌ខ្មៅ បើសិនមានករណីនេះកើតឡើង ក្រោយពីមករដូវ មុនសំអាតខ្លួនប្រាណ គេចាត់ទុកថា ជាឈាមរដូវ តែបើកើតឡើងក្រោយពីជ្រះស្អាតខ្លួនប្រាណរួចហើយនោះគេមិនចាត់ទុកជាឈាមរដូវនោះទេ ដោយសំអាងទៅលើប្រសាសន៍របស់អ៊ុមមូអាទីយ៉ះប្រពន្ធរបស់ណាពីមូហាំម៉ាត់ដែលបានមានប្រសាសន៍ថា៖

**لِقَوْلِ أُمِّ عَطِيَّةَ رَضِيَ اللهُ عَنْهَا:(كُنَّا لا نَعُدُّ الصُّفْرَةَ وَالْكُدْرَةَ بَعْدَ الطُّهْرِ شَيْئًا) رواه البخاري وأبو داود بسند صحيح**

<u>មានន័យថា៖</u> *ក្រោយពីជ្រះស្អាតពីឈាមរដូវ យើងមិនបានចាត់ទុកឈាមក្រហមស្រាល និងល្អក់នោះជាឈាមរដូវឡើយ ។*
ចំណែកឯប្រសាសន៍មួយទៀតរបស់អាអ៊ីសះ បាននិយាយថា៖

**(حَتَّى تَرَيْنَ الْقِصَّةَ الْبَيْضَاءَ)**

<u>មានន័យថា៖</u> *រហូតដល់ពួកអ្នកឃើញទឹករំអិលពណ៌សធ្លាក់មក ។*
ប្រសាសន៍ខាងលើ ចង់បង្ហាញឲ្យឃើញថា: ការមានឈាមពណ៌ក្រហមស្រាល និងល្អក់ ពេលកំពុងនិងក្រោយពីមករដូវ គេចាត់ទុកថាជាឈាមរដូវ លុះត្រាណាគេឃើញមានធ្លាក់ទឹករំអិលពណ៌សទើបគេចាត់ទុកថាអស់រដូវ។

4. **ឈាមរដូវមានការរអាក់រអួល:**
ចំពោះស្ត្រីដែលមានឈាមរដូវរអាក់រអួលឃើញមួយថ្ងៃហើយក៏បាត់មួយថ្ងៃទៅវិញ ឬមានលក្ខណៈស្រដៀងគ្នានេះ។ ច្បាប់បានចែកជាពីរករណីដូចខាងក្រោម៖

- ស្ត្រីដែលកើតមានអាការៈឈាមធ្លាក់រអាក់រអួល ជាប់មិនដាច់ គេចាត់ទុកថាជាឈាមជម្ងឺ។ ចំពោះស្ត្រីមានអាការៈបែបនេះ គេចាត់ចូលក្នុងករណីឈាមជម្ងឺ។
- ស្ត្រីដែលពុំកើតមានអាការៈខាងលើ ដូចជាមានឈាមធ្លាក់រអាក់រអួលតែមួយរយៈ ហើយក៏បាត់ និងជ្រះស្អាតទៅវិញ។ ត្រង់ចំនុចនេះពួកសាសនវិទូអ៊ីស្លាមមានការខ្វែងគំនិតគ្នាថា តើគួរចាត់ចូលក្នុងករណីឈាមរដូវ ឬឈាមជម្ងឺ។

យោងតាមនិកាយអ៊ីម៉ាំ សេីហ្វ៊ីអ៊ីបានកំណត់ថា ចំពោះស្ត្រីដែលមានអាការៈបែបនេះ គេចាត់ទុកជាឈាមរដូវ ហេីយនេះជាជម្រេីសរបស់សាសនវិទូអ៊ីបនូតៃមីយ៉ះ។ ម្យ៉ាងវិញទៀតចំពោះនិកាយ អ៊ីម៉ាំអាពូហានីហ្វះ ក៏បានឯកភាពលេីទស្សនៈនេះដែរ ព្រោះទឹករំអិលពណ៌សមិនឃេីញកេីតមានក្នុងអាការៈបែបនេះឡេីយ ។ ប្រសិនជាឈាមធ្លាក់មករអាក់រអួលមិនដាច់ ហេីយគេចាត់ទុកថា ឈាមរដូវនោះនឹងនាំឲ្យកេីតមានផលវិបាក និងស្មុគ្រស្មាញសម្រាប់ស្ត្រីដែលមានអាការៈបែបនេះ។ មិនតែប៉ុណ្ណោះ ពុំមានសាសនវិទូអ៊ីស្លាមណាម្នាក់បានចាត់ទុកអការៈឈាមធ្លាក់រអាក់រអួលជាប់បែបនេះជាឈាមរដូវនោះឡេីយ ព្រោះសាសនាអ៊ីស្លាមមិនបង្កឲ្យកេីតមានភាពស្មុគ្រស្មាញ និងការលំបាកដល់អ៊ីស្លាមសាសនិកនោះឡេីយ។

ដូចអល់ឡោះបានមានបន្ទូលនៅក្នុងគម្ពីអាល់គួរអានថាៈ

**(وَمَا جَعَلَ عَلَيْكُمْ فِى الدِّيْنِ مِنْ حَرَجٍ) سورة الحج، آية 78**

<u>មានន័យថា</u>៖ *"អល់ឡោះមិនដាក់បន្ទុកធ្ងន់ទៅលេីពួកអ្នកក្នុងកិច្ចសាសនានោះឡេីយ"* ។

**5-ការរាំងរដូវៈ** ចំពោះស្ត្រីដែលមករដូវ ស្រាប់តែបាត់ឈាម ហេីយមានជាតិរំអិលសេីមធ្លាក់មកមុនពេលជ្រះស្អាតគេចាត់ទុកថាជាឈាមរដូវ។ តែប្រសិនបេីកេីតមានអាការៈបែបនេះក្រោយពេលជ្រះស្អាត គេពុំចាត់ទុកថាវាជាឈាមរដូវនោះឡេីយ ព្រោះវាស្ថិតក្នុងអាការៈឈាមក្រហមស្រាល និងល្អក់។

៙៙❈៙៙

## ជំពូកទី ៤

## ករណីឈាមរដូវនិងបញ្ញត្តិច្បាប់

ទាក់ទងនឹងករណីឈាមរដូវ ច្បាប់អ៊ីស្លាមបានហាមឃាត់ចំពោះស្ត្រីដែលកំពុងមករដូវក្នុងការប្រតិបត្តិករណីយកិច្ចដូចខាងក្រោម៖

**១- ការប្រតិបត្តិសឡាត ៖** ករណីឈាមរដូវ ច្បា ប់អ៊ីស្លាមបានកម្រិតច្បាប់មិនអនុញ្ញាតឲ្យស្ត្រីដែលកំពុងមករដូវ ធ្វើការប្រតិបត្តិសឡាតទាំងហ្វារទូ និងស៊ូណាត់។ប៉ុន្តែច្បាប់តម្រូវអោយស្ត្រីទាំងនោះបំពេញសឡាតហ្វារទូ និងស៊ូណាត់ក្រោយពីជ្រះស្អាតពីឈាមរដូវ ទោះបីជា ពួកនាងបានជ្រះស្អាតមុនពេលផុតម៉ោងប្រតិបត្តិសឡាតចំនួនថេរវេលាមួយរ៉ក់អាត់ក៏ដោយ ក៏ពួកនាងត្រូវតែបំពេញការប្រតិបត្តិសឡាតនោះឡើងវិញដែរ។ ពួកនាងក៏ត្រូវតែបំពេញករណីយកិច្ចនេះទោះបីពួកនាងបានជ្រះស្អាតពីឈាមរដូវ នៅដើម ឬនៅចុងម៉ោងសឡាតក៏ដោយចុះ។ **ឧទាហរណ៍ថា:** ស្ត្រីម្នាក់មករដូវក្រោយពីដល់ម៉ោងបន្តិចនៃកិច្ចប្រតិបត្តិសឡាតពេលថ្ងៃលិច[3]។ ក្នុងករណីនេះនាងត្រូវបំពេញករណីយកិច្ចសឡាតថ្ងៃលិចនោះឡើងវិញ ក្រោយពេលដែលនាងជ្រះស្អាតពីឈាមរដូវ ព្រោះនាងបានទាន់ម៉ោងសឡាតមុនពេលមករដូវ។ ដូចគ្នាផងដែរ ចំពោះស្ត្រីដែលបាត់រដូវ និងជ្រះស្អាតនៅចុងម៉ោងសឡាតណាមួយនោះ នាងក៏ត្រូវតែបំពេញសឡាតនោះឡើងវិញផងដែរ។ **ឧទាហរណ៍ថា:** ស្ត្រីម្នាក់បានជ្រះស្អាតពីឈាមរដូវ នៅមុនពេលផុតម៉ោងសឡាតបន្តិចនៅពេលទៀបភ្លឺ[4] នោះ

---

[3] ការថ្វាយបង្គំពេលថ្ងៃលិច គឺសឡាតម៉ាហ្គ្រិប។

នាងត្រូវតែបំពេញសឡាតនោះឡើងវិញ។ ចំពោះករណីទី1 និងទី2 ខាងលើ បើសិនជាមានរយៈពេលតិចជាងនោះ មិនត្រូវឲ្យបំពេញករណីយកិច្ចសឡាតឡើងវិញនោះឡើយ ។ ដូចដែលណាពីមូហាំម៉ាត់ លោកបានមានប្រសាសន៍ថា៖

**قوله صلى الله عليه وسلم (مَنْ أَدْرَكَ رَكْعَةً مِنَ الصَّلاَةِ فَقَدْ أَدْرَكَ الصَّلاَةَ)** متفق عليه

មានន័យថា៖ *អ្នកដែលបានទាន់មួយរ៉ក់អាត់សឡាត អ្នកនោះពិតជាទាន់ការប្រតិបត្តិសឡាតហើយ ។*

ប្រសាសន៍របស់ណាពីយើងខាងលើបញ្ជាក់ឲ្យឃើញថា ការដែលមិនទាន់មួយដងនៃការប្រតិបត្តិសឡាត នោះគេមិនចាត់ទុកថាទាន់ការប្រតិបត្តិសឡាតនោះទេ។

ដោយឡែកស្ត្រីដែលទាន់មុន ឬក្រោយម៉ោងសឡាតពេលរសៀល[5] នៃរយៈពេលមួយរ៉ក់អាត់ *តើនាងត្រូវបំពេញករណីយកិច្ចសឡាតទៀបភ្លឺ និងសឡាតថ្ងៃត្រង់[6] នោះឡើងវិញដែរ ឬទេ?* ចុះបើនាងជ្រះស្អាតពីឈាមរដូវ ដោយទាន់មួយរ៉ក់អាត់ក្នុងម៉ោងសឡាតពេលយប់វិញ *តើនាងត្រូវបំពេញករណីយកិច្ចសឡាតពេលថ្ងៃលិចជាមួយនឹង*

[4] ការថ្វាយបង្គំពេលទៀបភ្លឺ គឺសឡាស៊ូប្ហោះ។

[5] ការថ្វាយបង្គំពេលរសៀល គឺសឡាតអាសើរ។

[6] ការថ្វាយបង្គំពេលថ្ងៃត្រង់ គឺសឡាតហ្ស៊ូហួរ។

[7] ការថ្វាយបង្គំពេលយប់ គឺសឡាតអ៊ីសើ។

*ពេលយប់បានដែរឬទេ?* ពាក់ព័ន្ធនឹងបញ្ហានេះ សាសនវិទូអ៊ីស្លាម បានខ្វែងយោបល់គ្នា តែអ្វីដែលត្រឹមត្រូវនោះគឺ នាងមិនត្រូវបំពេញ ករណីយកិច្ចសួទ្បាតពេលទៀបភ្លឺ និងពេលថ្ងៃលិចនោះទេ លើក លែងម៉ោងសឡាតពេលរសៀល និងពេលយប់ដែលនាងបានទាន់ ប៉ុណ្ណោះ។ ណាពីមូហាំម៉ាត់បានមានប្រសាសន៍ថា៖

**قوله صلى الله عليه وسلم (مَنْ أَدْرَكَ رَكْعَةً مِنَ الْعَصْرِ قَبْلَ أَنْ تَغْرُبَ الشَّمْسُ فَقَدْ أَدْرَكَ الْعَصْرَ) متفق عليه**

<u>មានន័យថា</u>៖ *អ្នកដែលបានទាន់មួយរ៉ក់អាត់សឡាតពេលរសៀល មុនថ្ងៃលិច អ្នកនោះពិតជាទាន់សឡាតពេលរសៀលនោះហើយ។*

ប្រសាសន៍របស់ណាពីយើងខាងលើពុំបញ្ជាក់ឲ្យឃើញថា អ្នក នោះត្រូវបំពេញករណីយកិច្ចសឡាតពេលទៀបភ្លឺ និងពេលរសៀល ឡើយគឺឲ្យបំពេញករណីយកិច្ចណាដែលគេទាន់ប៉ុណ្ណោះ។

បំណកស្រាយខាងលើ គឺស្របទៅតាមនិកាយអ៊ីម៉ាំ អាពូហានីហ្វះ និង អ៊ីម៉ាំម៉ាលិក។

រីឯការសុំបួងសួង រំលឹក សរសើរ មានដូចជាតឹកព្បៀរ តាសព្បៀហា តះមីដ និងសូត្រ بسم الله ពេលទទួលទាន និងបរិភោគចំណីផ្សេងៗ និងការសូត្រគួរអាន ដោយទន្ទេញចាំមាត់នោះ **ច្បាប់អ៊ីស្លាមពុំបាន ហាមឃាត់ចំពោះស្ត្រីដែលកំពុងមករដូវនោះឡើយ។**

ដោយសំអាងលើអំណះអំណាង ដែលមាននៅក្នុងសៀវភៅ កម្រង

សុក្រឹត (صحيح) ដែលចងក្រងដោយ ព្រឹទ្ធាចារ្យសាសនវិទូទាំងពីរ គឺ អ៊ីម៉ាំអាល់ពូខរី និងមុស្លីម ព្រមទាំងសាសនវិទូអ៊ីស្លាមផ្សេងៗទៀត។ មិនតែប៉ុណ្ណោះ ណាពីមូហាំម៉ាត់បានគេងកើយលើភ្លៅប្រពន្ធលោក ឈ្មោះអាអ៊ីសះ ខណៈពេលដែលប្រពន្ធរបស់លោកកំពុងតែមករដូវ ហើយសូត្រអាល់គួរអានទៀតផង ។ មានកំណត់ត្រានូវប្រសាសន៍ របស់លោកស្តីពីរឿងនេះនៅក្នុងសៀវភៅ កម្រងសុក្រឹតរបស់សាស នវិទូ អាល់ពូខរី និងមុស្លីម ដែលបានទទួលយកប្រសាសន៍នេះ ពី ប្រពន្ធរបស់ណាពីឈ្មោះ អ៊ុមមូអាទីយ៉ះ បានមានប្រសាសន៍ថា៖

**قَالَ النَّبِيُّ صلى الله عليه وسلم: (يَخْرُجُ الْعَوَاتِقُ وَ ذَوَاتُ الْخُدُوْرِ وَالْحُيَّضُ يَعْنِيْ إِلىَ صَلاَةِ الْعِيْدَيْنِ وَلْيَشْهَدْنَ الْخَيْرَ وَدَعْوَةَ الْمُؤْمِنِيْنَ وَيَعْتَزِلُ الْحُيَّضُ الْمُصَلَّى)**

<u>មានន័យថា</u>៖ *ទាំងស្ត្រីចំណាស់ ពេញវ័យ និងមានរដូវ ចេញទៅបំពេញការប្រតិបត្តិសឡាត ថ្ងៃរ៉ាយ៉ាទាំងពីរ ដើម្បីឲ្យពួកគេបានចូលរួមក្នុងការសាងអំពើល្អ និងការអំពាវនាវរបស់ពួកអ្នកមានជំនឿ តែពួកស្ត្រីដែលមានរដូវ ត្រូវនៅដាច់ដោយឡែកពីកន្លែងសឡាត ។*

៙៙❋៙៙

## ស្ត្រីកំពុងមករដូវ និងការសូត្រគួរអាន

### ១-ការសូត្រអាល់គួរអាន៖

ប្រសិនបើគ្រាន់តែមើលនឹងភ្នែក អានក្នុងចិត្ត មិនគ្រលាស់អណ្តាតបញ្ចេញសម្លេងទេ នោះពុំមានបញ្ហាអ្វីឡើយ ។ ដូចជាអានអាល់គួរអានបើកស្រាប់ ឬឃ្លាគួរអានដែលគេសរសេរលើក្រដាសផ្ទាំ

ងបដាជាដើម។ សាសនវិទូ ណាវ៉ាវី បានសរសេរនៅក្នុងសៀវភៅ អាល់មូហាស្សាប់ (المهذب) ដែលមានខ្លឹមសារថា៖ " ចំពោះករណីនេះ គេបានអនុញ្ញាតដោយគ្មានការខ្វែងយោបល់អ្វីឡើយ នៅក្នុងចំណោមពួកសាសនវិទូអ៊ីស្លាម" ។ចំណែកការសូត្របញ្ចេញសម្លេងខ្លាំងៗវិញ សាសនវិទូអ៊ីស្លាមភាគច្រើនបានឯកភាពគ្នាថា ច្បាប់អ៊ីស្លាមបានហាមឃាត់ចំពោះស្ត្រីដែលកំពុងមករដូវ ក្នុងការសូត្រ អាល់គួរអានលឺសម្លេងខ្លាំង។ សាសនវិទូ អាល់ពួខរី និងសាសនវិទូ អ៊ិបនូចារៀរ អាល់តព្ហ៊ីរី និងអ៊ិបនូមុនហ្សៀរ បានឯកភាពគ្នាថា អ៊ីស្លាមបានអនុញ្ញាតឲ្យស្ត្រីកំពុងមករដូវអាចសូត្រអាល់គួរអានលឺសម្លេងបាន។ ជាមួយនេះគេបានសំអាងលើទស្សនៈចាស់របស់ មេនិកាយអ៊ីម៉ាំម៉ាលិក និងអ៊ីម៉ាំ ស៊ើហ្វីអ៊ី បានបកស្រាយនៅក្នុងសៀវភៅ ហ្វាត់ហ៊ុលព្ហ៊ីរី (فتح الباري) ដែលគេលើកយកកំណត់ត្រារបស់ សាសនវិទូអាល់ពួខរី ដែលរៀបរាប់ពីសាសនវិទូអ៊ីប្រហ៊ីមអាន់ណាអ៊ីមានខ្លឹមសារថា ៖ "ពុំមានបញ្ហាអ្វីចំពោះស្ត្រីកំពុងមករដូវដែលសូត្រអាល់គួរអានបញ្ចេញសម្លេងឲ្យគេលឺនោះទេ"។ម្យ៉ាងវិញទៀតសាសនវិទូអ៊ិបនូតៃមីយ៉ះ បានសរសេរនៅក្នុងសៀវភៅ ហ្វាតាវ៉ាម៉ាច្ចម៊ូក (مجموع فتاوي) របស់អ៊ិបនូ កសឹមថា "ការដែលហាមឃាត់ស្ត្រីពី ការសូត្រអាល់គួរអានលឺសំនោះ ពុំមានអំណះអំណាងច្បាស់លាស់នោះឡើយ" ។

ចំណែកប្រសាសន៍ របស់ណាពីមូហាំម៉ាត់វិញគឺ "ស្ត្រីដែលកំពុងមករដូវ និងអ្នកដែលរួមសង្វាស មិនទាន់ងូតទឹកសំអាតខ្លួន (អ្នកមានជូនុប)នោះ មិនត្រូវសូត្រអ្វីដែលមាននៅក្នុង អាល់គួរអាននោះឡើយ"។ ប៉ុន្តែប្រភពដែលពាំនាំឲ្យប្រសាសន៍នេះពុំមានសុក្រិតភាព និងច្បាស់

លាស់នោះទេ (ដោយពួកសាសនវិទូបានឯកភាពគ្នាថា ប្រសាសន៍នេះពុំត្រឹមត្រូវឡើយ)។ ប្រសិនបើស្ត្រីកំពុងមករដូវ ត្រូវអ៊ីស្លាមហាមឃាត់ក្នុងការសូត្រគួរអានដោយលឺសម្លេងមែននោះ ណាពីមូហាំម៉ាត់ប្រាកដជា នឹងបានបញ្ជាក់ប្រាប់មនុស្សនៅសម័យរបស់លោកពុំខានជាពិសេសភរិយារបស់លោក ឲ្យអស់សេចក្តីទាក់ទងនឹងបញ្ហានេះជាមិនខាន។ តែគ្មាននរណាម្នាក់បានធ្វើកំណត់ត្រា ច្បាស់លាស់ត្រឹមត្រូវ និងជាក់ស្តែងនូវប្រសាសន៍របស់ណាពី ស្តីពីការហាមឃាត់ស្ត្រីកំពុងមករដូវ ចំពោះការសូត្រគួរអានដោយលឺសម្លេងនោះឡើយ។ ដូច្នេះ យើងមិនត្រូវកំណត់ច្បាប់ ចំពោះករណីណាដែលអល់ឡោះនិងរ៉ស៊ូលរបស់ទ្រង់មិនបានបង្គាប់បញ្ជា ឬហាមឃាត់នោះឡើយ។

សេចក្តីដូចបានជ្រាបពីខាងលើ ស្ត្រីដែលមានរដូវ មិនមែនទើបតែមាននាសម័យនេះ គឺមានតាំងពីយូរណាស់មកហើយ ហើយបើច្បាប់ហាមឃាត់មែននោះ រ៉ស៊ូលប្រាកដជាបានហាមឃាត់ជាក់ជាមិនខានឡើយ។

ក្រោយពីបានវែកញែកនូវទស្សនៈខ្វែងគ្នារបស់សាសនវិទូអ៊ីស្លាមស្តីពីបញ្ហានេះយើងគួរគប្បីដឹងថាជាការប្រសើរចំពោះស្ត្រីកំពុងមករដូវ មិនត្រូវសូត្រគួរអានលឺសម្លេង លើកលែងករណីចាំបាច់ណាមួយ ដូចជាស្ត្រីនោះជាគ្រូបង្រៀន ត្រូវប្រលងសិស្ស ឬខ្លួនឯងត្រូវប្រលង ឬករណីចាំបាច់ណាដែលប្រហាក់ប្រហែលនឹងអ្វីដែលបានរៀបរាប់ខាងលើ (នេះជាទស្សនៈផ្ទាល់របស់អ្នកចងក្រងសៀវភៅនេះ) ។

**២-ការបួស៖**

ករណីស្ត្រីកំពុងមករដូវ អ៊ីស្លាមបានកំណត់ច្បាប់មិនអនុញ្ញាត

ឲ្យស្ត្រីនោះបួស ទោះជាបួសខែរ៉ម៉ាដ្ហន ឬបួសស៊ូណាត់ក៏ដោយ។ ប៉ុន្តែតម្រូវឲ្យស្ត្រីនោះបួសសងវិញ ចំពោះបួសករណីយកិច្ច (ហ្វារទូ) ក្រោយពេលជ្រះស្អាតពីឈាមរដូវ ក្រោយពីផុតខែរ៉ម៉ាដ្ហននោះ។ ដោយយោងតាមប្រសាសន៍របស់អាអ៊ីសះថា៖

**قالت عائشة رضي الله عنها (كَانَ يُصِيْبُنَا ذَلِكَ تَعْنِي الْحِيْضُ فَنُؤْمَرُ بِقضَاءِ الصَّوْمِ وَلاَ نُؤْمَرُ بِقضَاءِ الصَّلاَةِ )**

**متفق عليه**

មានន័យថា៖ *យើងតែងជួបប្រទះបញ្ហានេះ មានន័យថាឈាមរដូវ ដូច្នេះគេប្រើឲ្យពួកយើងបួសសង តែគេមិនប្រើឲ្យពួកយើងប្រតិបត្តិសឡាតសងនោះទេ ។*

យោងតាមប្រសាសន៍ខាងលើ ចំពោះស្ត្រីដែលកំពុងបួស ស្រាប់តែមានរដូវមកគឺបួសរបស់នាងនៅថ្ងៃនោះត្រូវខូច ហើយត្រូវច្បាប់ហាមលើរូបនាងចាប់ពីពេលមករដូវនោះ រហូតដល់ជ្រះស្អាតខ្លួន (ទាល់តែអស់រដូវ) ទើបអាចបួសតទៅទៀតបាន។ លុះចប់ខែបួសទើបគេអាចបួសសងនូវចំនួនថ្ងៃដែលបានខូចនោះ។ មួយវិញទៀត ចំពោះស្ត្រីដែលកំពុងបួស ហើយមុនថ្ងៃលិចបន្តិច នាងដូចជាមានអារម្មណ៍ថាដូចជាមានមករដូវ តែពុំមានឃើញសញ្ញាណអ្វីសម្គាល់ទេ នោះការបួសរបស់នាងនាថ្ងៃនោះពុំខូចខាតអ្វីទេ គឺអាចយកជាការបាន ព្រោះឈាមដែលនៅក្នុងខ្លួនពុំមានច្បាប់ចែងថា ជាឈាមរដូវនោះឡើយ ទាល់តែធ្លាក់ចេញមកខាងក្រៅ ទើបគេចាត់ទុកថាវាគឺ ឈាមរដូវ។

នៅថ្ងៃមួយមានគេសួរណាពីថា ចំពោះស្ត្រីដែលយល់សប្តិឃើញរួមសង្វាស ដូចដែលបុរសធ្លាប់យល់សប្តិឃើញនោះ តើនាងចាំបាច់ត្រូវងូតទឹកដែរ ឬទេ? លោកបានឆ្លើយថា៖ **“ត្រូវងូតទឹក ប្រសិនបើគេឃើញមានទឹកកាម” ។**

លោកបានកំណត់ឲ្យងូតទឹក ប្រសិនបើឃើញមានទឹកកាម វាបង្ហាញថា ឈាមរដូវពុំមែនកំណត់លើការមានអារម្មណ៍នោះទេ ពោលគឺឃើញមានឈាមធ្លាក់មកជាក់ស្តែង ទើបអាចចាត់ទុកថាមានមករដូវបាន។ ប្រសិនបើចូលដល់ម៉ោងសឡាតពេលទៀបភ្លឺ ហើយនាងនៅឃើញមានមករដូវ ការបួសរបស់នាងនាថ្ងៃនោះគេចាត់ទុកជាអាសារបង់ ទោះបីជានាងបានជ្រះស្អាតពីឈាមរដូវ ក្រោយម៉ោងសឡាតពេលទៀបភ្លឺបន្តិចក៏ដោយ ។ ផ្ទុយទៅវិញ ប្រសិនបើនាងបានជ្រះស្អាតមុនម៉ោងសឡាតពេលទៀបភ្លឺតែបន្តិចនោះ ការបួសរបស់នាងអាចយកជាការបាន ពុំខូចខាតអ្វីឡើយ ទោះជានាងមិនទាន់បានងូតទឹកសំអាតខ្លួនក៏ដោយ ដូចក្នុងករណីងូតទឹកសំអាតខ្លួន ក្រោយពីការរួមសង្វាសផងដែរ។

ដូចដែលអ្នកស្រីអាអ៊ីស:បានមានប្រសាសន៍ថា៖

**(كَانَ النَّبِيُّ صلى الله عليه وسلم: يُصْبِحُ جُنُبًا مِنْ جِمَاع غَيْرِاحْتِلَامٍ ثُمَّ يَصُوْمُ فِيْ رَمَضَانَ)      متفق عليه**

<u>មានន័យថា</u>៖ *ណាពីលោកបានក្រោកពីដំណេក នៅពេលព្រឹកមិនទាន់ងូតទឹកក្រោយពេលរួមសង្វាស មិនមែនដោយសារការយល់សប្តិទេ បន្ទាប់មកលោកបួសនៅក្នុងខែរ៉ម៉ាឌូនជាធម្មតា ។*

## ៣-ការដើរតវ៉ាហ្វជុំវិញកាក់ពួះ

ស្ត្រីកំពុងមករដូវ មិនត្រូវបានអនុញ្ញាតឲ្យដើរតវ៉ាហ្វ ជុំវិញកាក់ពួះ(كعبة)ទេ ទោះគេខំដើរ ក៏គ្មានបានទទួលផលបុណ្យអ្វីសម្រាប់ខ្លួនគេដែរ ទាំងហាជ្ជ និងអ៊ុមរ៉ោះ។ដោយយោងទៅតាមប្រសាសន៍របស់ណាពីមូហាំម៉ាត់ដែលលោកបានមានប្រសាសន៍ ទៅកាន់ប្រពន្ធរបស់លោក ឈ្មោះអាអ៊ីសះថា៖

**(اِفْعَلِيْ مَا يَفْعَلُ الْحَاجُّ غَيْرَ أَنْ لاَ تَطُوْفِيْ بِالْبَيْتِ حَتَّى تَطْهُرِيْ)**

<u>មានន័យថា</u>៖ *"ចូរអ្នកធ្វើនូវអ្វីដែលបណ្តាអ្នកធ្វើហាជ្ជកំពុងធ្វើ តែកុំដើរតវ៉ាហ្វជុំវិញកៈពួះ (كعبة) ឲ្យសោះ លុះត្រាតែអ្នកបានជ្រះស្អាត។*

ចំណែកឯកិច្ចការផ្សេងៗទៀត ដូចជាដើសើអ៊ីរវាងភ្នំសហ្វា និងម៉ាវ៉ះ ការស្នាក់នៅអារ៉ហ្វៈ ការដេកសម្រាកនៅ មុហ្សឌ្លើលីហ្វះ និងមីណា ការគប់គោល និងកិច្ចការផ្សេងៗទៀត ទាំងនោះអ៊ីស្លាមពុំបានដាក់ច្បាប់ហាមឃាត់ចំពោះស្ត្រីកំពុងមករដូវមិនឲ្យប្រតិបត្តិនោះឡើយ។

## ៤-ស្ត្រីមានរដូវ និងការដើរតវ៉ាហ្វ៖

នៅពេលដែលស្ត្រីបានបំពេញកិច្ចការហាជ្ជ និងអ៊ុមរ៉ោះចប់សព្វគ្រប់ ស្រាប់តែនាងមានរដូវមុនការចាកចេញពីដីម៉ាក្កះ ហើយឈាមរដូវនោះនៅបន្តរហូតដល់ថ្ងៃចេញដំណើរ។ ក្នុងករណីនេះគេអនុញ្ញាតឲ្យនាងចេញដំណើរទៅដោយពុំចាំបាច់ដើរតវ៉ាហ្វលានោះទេ។ ដោយសំអាងលើប្រសាសន៍មួយ ពាំនាំមកដោយសាវ័កម្នាក់ ឈ្មោះអ៊ិបនូអាប់ញ៉ើស ដោយគាត់បានលើកឡើងថា៖

لحديث ابن عباس رضي الله عنهما قال: (أُمِرَ النَّاسُ أَنْ يَكُوْنَ آخِرَ عَهْدِهِمْ بِالْبَيْتِ إِلاَّ أَنَّهُ خُفِّفَ عَنِ الْمَرْأَةِ الْحَائِضَةِ) متفق عليه

<u>មានន័យថា៖</u> *គេបង្គាប់បញ្ជាឲ្យមនុស្សទាំងឡាយ ឲ្យបំពេញបញ្ចប់ការធ្វើហាជ្ជរបស់ពួកគេនៅកាក់ប៉ះ លើកលែងតែស្ត្រីដែលកំពុងមករដូវត្រូវបានគេបន្ធូរបន្ថយ ។*

មិនជាការប្រសើរ ចំពោះស្ត្រីកំពុងមករដូវ ទៅឈរនៅមាត់ទ្វារកាក់ប៉ះ ហើយសុំបួងសួងចំពោះអល់ឡោះជាម្ចាស់ ពីព្រោះណាពីមូហាំមម៉ាត់ពុំបានបង្គាប់ប្រើឲ្យធ្វើយ៉ាងដូច្នោះនោះឡើយ។ យើងជាសាសនិកអ៊ីស្លាម ត្រូវអនុវត្ត និងប្រកាន់យកនូវអ្វីដែលណាពីយើងបានបង្រៀន និងបង្គាប់បញ្ជានិងមិនត្រូវធ្វើអ្វីមួយខុសពីស៊ុណ្ណះរបស់លោកឡើយ។ នៅក្នុងរឿងរបស់សហ្វីយ៉ះ ដែលបានដើរតវ៉ាហ្វខណៈដែលនាងកំពុងមករដូវ រួចណាពីមូហាំម៉ាត់ បាននិយាយទៅកាន់នាងថា៖

قال النبي صلى الله عليه وسلم: (فَلْتَنْفِرْ إِذَنْ) متفق عليه

<u>មានន័យថា៖</u> *អញ្ចឹង ចូរអ្នកចេញដំណើរចុះ ។*

ណាពីមូហាំម៉ាត់ មិនបានបង្គាប់ឲ្យនាងទៅកន្លែងទ្វារ កាក់ប៉ះទេ ។ ប្រសិនបើប្រការនោះមានពិតមែននោះ លោកនឹងបញ្ជាក់ប្រាប់ជាក់

ជាមិនខាន។ ចំណែកការដើរតវ៉ាហ្វជុំវិញកាក់ព្ហះ ដែលជារូកុនហាជ្ជ និងអ៊ុមរ៉ោះមិនអាចខានបាន ចំពោះស្ត្រីដែលកំពុងមករដូវ ត្រូវបំពេញកិច្ចការនេះបន្ទាប់ពីជ្រះស្អាតពីឈាមរដូវ។

**៥-ការស្ថិតនៅក្នុងម៉ាស្ជិតៈ**

ចំពោះស្ត្រីដែលកំពុងមករដូវ ច្បាប់អ៊ីស្លាមមិនអនុញ្ញាតឲ្យអង្គុយ ឬស្ថិតនៅក្នុងមាស្ជិតឡើយ សូម្បីកន្លែងវាលដែលគេធ្វើការប្រមូលផ្តុំដើម្បីធ្វើការប្រតិបត្តិសឡាតនៅថ្ងៃរ៉ាយ៉ោក៏មិនអនុញ្ញាតដែរ។ ដោយយោងទៅតាមប្រសាសន៍របស់ណាពីមូហាំម៉ាត់ ដែលអ៊ុមមូអាទីយ៉ះបានពាំនាំមកបញ្ជាក់ឡើងវិញថាៈ

**قَالَ النَّبِيُّ صلى الله عليه وسلم: (يَخْرُجُ الْعَوَاتِقُ وَ ذَوَاتُ الْخُدُوْرِ وَالْحُيَّضُ يَعْنِيْ إِلَى صَلاَةِ الْعِيْدَيْنِ وَلْيَشْهَدْنَ الْخَيْرَ وَدَعْوَةَ الْمُؤْمِنِيْنَ وَيَعْتَزِلُ الْحُيَّضُ الْمُصَلَّى)**

<u>មានន័យថាៈ</u>*ទាំងស្ត្រីចំណាស់ ពេញវ័យ និងមានរដូវ ចេញទៅបំពេញការប្រតិបត្តិសឡាត ថ្ងៃរ៉ាយ៉ោទាំងពីរ ដើម្បីឲ្យពួកគេបានចូលរួមក្នុងការសាងអំពើល្អ និងការអំពាវនាវរបស់ពួកអ្នកមានជំនឿ តែពួកស្ត្រីដែលមានរដូវ ត្រូវនៅដាច់ដោយឡែកពីកន្លែងសឡាត ។*

**៦-ការរួមភេទជាមួយស្វាមីៈ**

អ៊ីស្លាមបានហាមឃាត់ចំពោះការរួមភេទ ខណៈពេលដែលស្ត្រីទាំងកំពុងមករដូវ។ ភរិយាមិនត្រូវបណ្តោតបណ្តោយ ឬផ្តល់ឱកាសឲ្យស្វាមីធ្វើការរួមភេទជាមួយខ្លួន ខណៈពេលដែលខ្លួនកំពុងមករដូវនោះឡើយ។ ដូចជាអល់ឡោះបានមានបន្ទូល នៅក្នុងគម្ពីអាល់គួរ

អានថា៖

**(وَيَسْئَلُوْنَكَ عَنِ الْمَحِيْضِ قُلْ هُوَ أَذًى فَاعْتَزِلُوا النِّسَاءَ فِى الْمَحِيْضِ وَلاَ تَقْرَبُوْهُنَّ حَتَّى يَطْهُرْنَ) سورة البقرة آية 222**

*មានន័យថា៖ ហើយពួកគេនឹងសួរអ្នក (មូហាំម៉ាត់) អំពីការមករដូវ ចូរឆ្លើយថា វាជាអាហា្រ ដូច្នេះចូរពួកអ្នកជៀសវាងការរួមសង្វាស ជាមួយប្រពន្ធ ខណៈពេលនាងមករដូវ លុះត្រាណាពួកនាងជ្រះស្អាត (បានងូតទឹកសំអាតខ្លួន)។*

ណាពីមូហាំម៉ាត់ក៏បានមានប្រសាសន៍ផងដែរថា៖

**قال رسول الله صلى الله عليه وسلم: (اِصْنَعُوْا كُلَّ شَيْئٍ إِلاَّ النِّكَاحَ ) يَعْنِي اَلْجِمَاعَ رواه مسلم**

<u>មានន័យថា:</u>( *ចូរពួកអ្នកធ្វើអ្វីក៏បានដែរ លើកលែងតែការរៀបអាពាហ៍ពិពាហ៍*) មានន័យថា ការរួមភេទ។

សាសនាអ៊ីស្លាមបានអនុញ្ញាតចំពោះប្តី រួមភេទជាមួយភរិយានៅត្រង់ទ្វារមាសប៉ុណ្ណោះ (រន្ធយោនី)។ដូច្នេះពេលស្រ្តីមករដូវគេមិនអនិញ្ញាតឲ្យស្រ្តីនោះធ្វើការរួមភេទជាមួយប្តីរបស់គេនោះឡើយ ដូចមានចែងពីករណីនេះនៅក្នុងអាល់គួរអាននិងស៊ុណ្ណះរបស់ណាំពិមូហាំម៉ាត់។ ចំពោះជនមុស្លីមដែលបានប្រព្រឹត្តល្មើសនឹងបញ្ញត្តិនេះ គេចាត់ទុកថាជាអ្នកប្រឆាំងនឹងអល់ឡោះជាម្ចាស់ ប្រឆាំងនឹងណាពីរបស់ទ្រង់ និងដើរផ្ទុយពីមាគ៌ាអ៊ីស្លាមដ៏ត្រឹមត្រូវ។ សាសនវិទូអ៊ីមុាំណាវ៉ាវី បាន

សរសេរនៅក្នុងសៀវភៅ អាល់មូហាហ្សាប់ (المهذب) ទំព័រ៣៧១ ភាគទី២ ថា: មេនិកាយអ៊ីម៉ាំសើហ្វីបានលើកឡើងថា៖

**(مَنْ فَعَلَ ذَلِكَ فَقَدْ أَتَى كَبِيْرَةً)**

<u>មានន័យថា</u>៖ *អ្នកដែលបានប្រព្រឹត្តដូច្នោះ គឺគេបានប្រព្រឹត្តអំពើបាបកម្មដ៏ធំ ។*

បានសេចក្តីថា ជនមុស្លីមដែលបានរួមភេទជាមួយប្រពន្ធ ខណៈនាងកំពុងមករដូវនោះ គេចាត់ទុកថាបុគ្គលនោះបានប្រព្រឹត្តបាបកម្មធ្ងន់ធ្ងរមួយ។

ចំពោះអ្នកដើរតាមនិកាយសើហ្វីអ៊ីមួយចំនួនទៀតបានកំណត់ថា៖

**(مَنْ اِسْتَحَلَّ وَطْءَ الْحَائِضِ حُكِمَ بِكُفْرِهِ)**

<u>មានន័យថា</u>៖អ្នកដែលបានអនុញ្ញាតឲ្យធ្វើការរួមភេទខណៈដែលស្ត្រីមករដូវនោះ ត្រូវគេកាត់សេចក្តីថាជាជនគ្មានជំនឿ។ ទោះជាយ៉ាងណាក៏ដោយក៏អ៊ីស្លាមបានអនុញ្ញាតឲ្យស្វាមីអាចថើបបបោសអង្អែលឱប និងប្រឡែងលេងសព្វខ្លួនប្រាណលើកលែងតែទ្វាមាសប៉ុណ្ណោះ។ ក៏ប៉ុន្តែជាការប្រសើរមិនត្រូវបបោសអង្អែលកន្លែងត្រង់នៅចន្លោះរវាងផ្ចិត និងក្បាលជង្គង់ឡើយ តែបើពីខាងក្រៅសម្លៀកបំពាក់មិនជាអ្វីទេ។ ដោយយោងតាមប្រសាសន៍របស់អាអ៊ីសះបាននិយាយថា៖

**(كَانَ النَّبِيُّ صلى الله عليه وسلم يَأْمُرُنِيْ فَأَتَّزِرُ فَيُبَاشِرُنِيْ وَأَنَا حَائِضٌ)** **متفق عليه**

<u>មានន័យថា</u>៖ *ណាពីមូហាំម៉ាត់រមែងប្រើឲ្យខ្ញុំស្លៀកពាក់ រួចលោក*

*ប្រឡែងលេងជាមួយខ្ញុំ ខណៈដែលខ្ញុំកំពុងមករដូវ ។*

**៧-ការលែងលះ ៖**

អ៊ីស្លាមបានហាមឃាត់ចំពោះការលែងលះគ្នា ខណៈដែលស្ត្រីកំពុងមករដូវ។ ដូចជាអល់ឡោះមានបន្ទូលថា៖

**قال تعالى:(يَاأَيُّهَا النَّبِيُّ إِذَا طَلَّقْتُمُ النِّسَاءَ فَطَلِّقُوْ هُنَّ لِعِدَّتِهِنَّ)سورة الطلاق 1**

<u>មានន័យថា:</u> *ឱណាពី (ព្រមទាំងអ្នកដែលមានជំនឿ) ប្រសិនបើពួកអ្នកចង់លែងលះប្រពន្ធ ចូរពួកអ្នកលែងក្នុងអ៊ីដឌ្ហះរបស់ពួកនាង ។*

មានន័យថា ត្រូវលែងលះពេលនាងជ្រះស្អាតពីឈាមរដូវ និងមិនទាន់រួមភេទ។

បុរសជាប្តីអាចលែងលះប្រពន្ធបានពេលមានផ្ទៃពោះជ្រះស្អាតពីឈាមរដូវ និងមិនទាន់រួមភេទ ពីព្រោះបើគេលែងលះពេល មានរដូវ គឺមិនអាចកំណត់រយៈពេលអ៊ីដឌ្ហះក្នុងពេលលែងលះបានឡើយ។ ស្ត្រីដែលត្រូវប្តីលែង ខណៈពេលកំពុងមករដូវនោះ គេ មិនអាចរាប់បញ្ចូលក្នុងរយៈពេលអ៊ីដឌ្ហះឡើយ តែបើត្រូវប្តីលែងក្រោ យពីជ្រះស្អាតតែបានរួមភេទនោះ ក៏គេមិនអាចកំណត់រយៈពេលរង់ចាំនៃការលែងលះនោះបានដែរ ព្រោះមិនដឹងថា តើប្រពន្ធនោះអាច មាន ផ្ទៃពោះ ឬមិនមាន និងមិនអាចកំណត់បានថា តើនាងស្ថិតក្នុងរយៈពេលរង់ចាំ ក្នុងនាមជាស្ត្រីមានផ្ទៃពោះ ឬជាស្ត្រីមករដូវ? ដូច្នេះ ក្នុងស្ថានភាព ស្រពិចស្រពិល មិនជាក់លាក់បែបនេះ

អ៊ីស្លាមបានហាមឃាត់ និង មិនអនុញ្ញាត

ឲ្យមានការលែងលះប្រពន្ធឡើយ លុះត្រាតែស្ថិតក្នុង ស្ថានភាពណាមួយច្បាស់លាស់ ទើបអាចលែងលះបាន។ ត្រង់នេះបង្ហាញឲ្យឃើញថា ការលែងលះប្រពន្ធ ខណៈដែលនាង កំពុងមករដូវ ត្រូវច្បាប់អ៊ីស្លាមហាមឃាត់ ដោយសំអាងលើបន្ទូលខាងលើ និង ប្រសាសន៍របស់ណាពីមូហាំម៉ាត់ ដែលកត់ត្រាក្នុងសៀវភៅកម្រងសុក្រឹតរបស់សាសនវិទូទាំងពីរ អាល់-ពូខរី និង មូស្លីម ព្រមទាំងសាសនវិទូផ្សេងៗទៀត បានបញ្ជាក់ថា កូនប្រុសសរបស់អ៊ូម៉ើរ បានលែងលះប្រពន្ធ ខណៈពេលដែលនាងកំពុងមករដូវ ហើយអ៊ូម៉ើរ ក៏បានយករឿងនេះទៅជម្រាប ណាពីមូហាំម៉ាត់។ ពេលលោកបានឮដូចនោះ លោកក៏បានមានការខឹងសម្បារយ៉ាងខ្លាំង ហើយបានមាន ប្រសាសន៍ថា៖

**(مُرْهُ فَلْيُرَاجِعْهَا ثُمَّ لِيُمْسِكْهَا حَتَّى تَطْهُرَ ثُمَّ تَحِيْضُ ثُمَّ تَطْهُرَ ثُمَّ إِنْ شَاءَ أَمْسَكَ بَعْدُ وَإِنْ شَاءَ طَلَّقَ قَبْلَ أَنْ يَمَسَّ فَتِلْكَ الْعِدَّةُ الَّتِيْ أَمَرَ اللهُ أَنْ تُطَلَّقَ لَهَا النِّسَاءُ)**

<u>មានន័យថា</u>៖ *ចូរអ្នកប្រើឲ្យគេត្រលប់ទៅរកប្រពន្ធវិញ ហើយរួមរស់នៅជាមួយនាងរហូតនាងជ្រះស្អាតពីឈាមរដូវ បន្ទាប់មកនាងមានរដូវម្តងទៀត ហើយរង់ចាំរហូតជ្រះស្អាត (ពេលនេះប្រសិនបើគេចង់រស់នៅជាមួយនាង) ចូរឲ្យគេរស់នៅចុះ ប្រសិនបើគេចង់លែងលះ ចូរឲ្យគេលែងលះ មុនគេធ្វើការរួមភេទជាមួយនាង នោះហើយជា*

*រយៈពេលរង់ចាំ ដែលអល់ឡោះបានបង្គាប់បញ្ជាមុននឹងធ្វើការលែងលះស្ត្រី។*

ជនណាដែលបានលែងលះប្រពន្ធ ខណៈដែលនាងកំពុងមករដូវ ជននោះបានប្រព្រឹត្តអំពើបាប ហើយគេត្រូវត្រលប់ទៅសុំការលុបលាងទោសកំហុសពីអល់ឡោះជាម្ចាស់ និងត្រលប់ទៅរស់នៅជាមួយប្រពន្ធវិញ។ គេត្រូវរង់ចាំក្រោយពេលនាងជ្រះស្អាតពីឈាមរដូវលើកទីមួយ និងលើកទីពីរសិន បន្ទាប់ពីនោះគេអាចជ្រើសរើសបានថា តើគេគួរនឹងត្រលប់មករួមរស់ជាមួយគ្នា ឬលែងលះគ្នា បើចង់លែងលះ ត្រូវលែងលះមុននឹងធ្វើការរួមភេទជាមួយនាង។

៣៣❋៣៣

**ច្បាប់អនុញ្ញាតឲ្យលែងលះប្រពន្ធពេលនាងកំពុងមករដូវមាន3ករណី**

**ករណីទី១៖**

ច្បាប់អនុញ្ញាតឲ្យប្តីធ្វើការលែងលះប្រពន្ធ មុនពេលរួមភេទជាមួយគ្នា ខណៈដែលប្រពន្ធកំពុងមករដូវ ដោយពុំចាំបាច់រង់ចាំរយៈពេលអ៊ីដឌ្ឌះឡើយ។ ដូច្នេះ របៀបលែងលះប្រពន្ធខាងលើ គឺស្របនឹងច្បាប់អ៊ីស្លាមដែលបានកំណត់។ អល់ឡោះបានមានបន្ទូលថា៖

(فَطَلِّقُوهُنَّ لِعِدَّتِهِنَّ...) سورة الطلاق 1

*មានន័យថា៖ ចូរពួកអ្នកលែងលះភរិយាក្នុងអ៊ីដឌ្ឌះរបស់ពួកនាង។*

**ករណីទី២៖**

ប្តីអាចលែងលះប្រពន្ធបាន ពេលដែលនាងកំពុងមករដូវខណៈដែលនាងកំពុងមានផ្ទៃពោះដូចមានបញ្ជាក់ពីខាងដើម។

**ករណីទី៣៖**

ប្តីអាចលែងលះប្រពន្ធដែលកំពុងតែមករដូវបាន នៅពេលណាការលែងលះនោះធ្វើឡើងដោយមានថ្នូរពីភរិយា។ ដូចជាប្តី ប្រពន្ធរស់នៅមិនចុះសម្រុងគ្នាហើយប្រពន្ធទាមទារការលែងលះក្នុងករណីនេះប្តីអាចធ្វើការលែងលះបានដោយមានថ្នូរនឹងអ្វីមួយពីប្រពន្ធ ទោះបីជាប្រពន្ធនោះកំពុងតែមករដូវក៏ដោយចុះ។

យោងតាមប្រសាសន៍របស់ណាពីមូហាំម៉ាត់ ដែលពាំនាំដោយអ៊ីបនូអាបបួាសថា៖

**قَالَ النَّبِيُّ صلى الله عليه وسلم: (أَتُرِدِّيْنَ عَلَيْهِ حَدِيْقَةَ ؟ قَالَتْ: نَعَمْ فَقَالَ رَسُوْلُ اللهِ صلى الله عليه وسلم: اَقْبَلِ الْحَدِيْقَةَ وَطَلِّقْهَا تَطْلِيْقَةً.** *رواه البخاري*

<u>មានន័យថា</u>៖ *"តើនាងព្រមប្រគល់សួនច្បារឲ្យទៅប្តីវិញដែរ ឬទេ?" នាងឆ្លើយថា "ចាំ នាងខ្ញុំព្រម"។ ពេលនោះរ៉សូលមូហាំម៉ាត់បានមានប្រសាសន៍ថា "ចូរអ្នកទទួលយកសួនច្បារនោះ ហើយធ្វើការលែងលះមួយដង (តឡាក់មួយ) សិនចុះ"*។

ត្រង់ចំនុចនេះ រ៉សូលមូហាំម៉ាត់ពុំបានសួរបញ្ជាក់ថា តើនាងកំពុងមករដូវ ឬក៏ជ្រះស្អាតនោះឡើយ។ ព្រោះការលែងលះនេះ ធ្វើឡើង

ដោយស្ត្រីទាមទារលោះខ្លួនរបស់នាង។ ដូច្នេះបង្ហាញថាច្បាប់អ៊ីស្លាមអនុញ្ញាតឲ្យប្តីលែងលះនៅពេលដែលមានតម្រូវការបែបនេះ បើទោះបីជាស្ថិតក្នុងស្ថានភាពបែបណាក៏ដោយ។

នៅក្នុងសៀវភៅ អាល់-មូហ្គនី (المغني) ទំព័រទី៥២ ភាគទី៧ អ្នកនិពន្ធបានសរសេរថា៖ "ច្បាប់អនុញ្ញាតឲ្យធ្វើការលែងលះតាមសំណូមពររបស់ភរិយាដោយប្តីយល់ព្រមទទួលជាថ្នូរក្នុងការលែងលះទោះជានាងកំពុងមករដូវក៏ដោយ។ មូលហេតុនៃការហាមឃាត់ចំពោះការលែងលះពេលប្រពន្ធកំពុងមករដូវនោះ ព្រោះគេជៀសវាងពីផលវិបាកចំពោះស្ត្រីដែលរង់ចាំរយៈពេលអ៊ីដឌ្ហះយូរពេក។ប៉ុន្តែបើប្រពន្ធទាមទារការលែងលះនោះ ប្តីអាចធ្វើការលែងលះបាន ពុំចាំបាច់គោរពតាមគោលការណ៍ខាងលើឡើយ។ ម្យ៉ាងវិញទៀត ការរស់នៅមិនចុះសម្រុងគ្នាអាចមានផលវិបាកច្រើនជាងការរង់ចាំរយៈពេលអ៊ីដឌ្ហះទៅទៀត។ ដូច្នេះអ៊ីស្លាមបានអនុញ្ញាតឲ្យ ជ្រើសរើសប្រការដែលងាយជំនួសការលំបាក។

## ៨-ការកំណត់រយៈពេលអ៊ីដ្ឌះនៃការលែងលះ ៖

នៅពេលដែលបុរសណាម្នាក់បានលែងលះប្រពន្ធ ក្រោយពីបានធ្វើការរួមភេទ ឬរួមរស់ជាមួយគ្នារួចនោះ ចាំបាច់ចំពោះភរិយាត្រូវរង់ចាំអ៊ីដឌ្ហះ ដែលមានរយៈពេលបីដង នៃការមានរដូវ (នេះសម្រាប់ស្ត្រីមានរដូវ មិនទាន់មានផ្ទៃពោះ)។ ដូចអល់ឡោះបានបន្ទូលថា៖

(وَالْمُطَلَّقَاتُ يَتَرَبَّصْنَ بِأَنْفُسِهِنَّ ثَلاثَةَ قُرُوْءٍ)

*سورة البقرة 228*

<u>មានន័យថា៖</u> *ហើយស្ត្រីប្ដីលែងនោះ ត្រូវរង់ចាំអ៊ីដឌះដែលមានរយៈពេលបីដងនៃការមករដូវ។*

ផ្ទុយទៅវិញ ចំពោះស្ត្រីដែលមានផ្ទៃពោះ ត្រូវរង់ចាំរយៈពេលអ៊ីដឌះរហូតដល់សម្រាលកូនរួច បើទោះបីជារយៈពេលនោះយូរ ឬឆាប់ក៏ដោយ។ ដូចជាអល់ឡោះមានបន្ទូលថា៖

(وَأُوْلَاتُ الْأَحْمَالِ أَجَلُهُنَّ أَنْ يَضَعْنَ حَمْلَهُنَّ)

سورة الطلاق 4

<u>មានន័យថា៖</u> *ហើយស្ត្រីដែលមានផ្ទៃពោះ ត្រូវរង់ចាំរយៈពេលអ៊ីដឌះរហូតដល់សម្រាលកូនរួច។*

ដោយឡែក ស្ត្រីពុំទាន់មាន ឬអស់រដូវ ដូចជានៅក្មេងពេកមិនទាន់មានរដូវ អ្នកអស់រដូវដោយសារចាស់ជរា ការវះកាត់ស្បូន ឬដោយប្រការផ្សេងៗទៀតដែលនាំឲ្យស្ត្រីគ្មានសង្ឃឹមថានឹងអាចមានរដូវឡើងវិញនោះ គេបានកំណត់នូវអ៊ីដឌះរយៈពេលបីខែ។

ដូចអល់ឡោះបានមានបន្ទូលថា៖

(وَالآئِى يَئِسْنَ مِنَ الْمَحِيْضِ مِنْ نِسَآئِكُمْ إِنِ ارْتَبْتُمْ فَعِدَّتُهُنَّ ثَلاثَةُ أَشْهُرٍ وَالآئِى لَمْ يَحِضْنَ)سورة الطلاق 4

<u>មានន័យថា៖</u> *ហើយស្ត្រីដែលអស់រដូវ ក្នុងចំណោមភរិយារបស់ពួក*

*អ្នក ប្រសិនបើនៅមានការសង្ស័យ ចូរកំណត់ការរង់ចាំអ៊ីដខ្ហះរយៈពេលបីខែ ក៏ដូចគ្នានេះដែរ ស្ត្រីដែលមិនទាន់មានរដូវ។*

ចំពោះស្ត្រីប្តីលែង ហើយរាំងរដូវដោយសារមូលហេតុណាមួយដូចជាជម្ងឺ ការបំបៅកូនជាដើម ស្ត្រីនោះត្រូវរង់ចាំរយៈពេលអ៊ីដខ្ហះ រហូតដល់មានរដូវឡើងវិញ ទើបកំណត់រយៈពេលអីដខ្ហះបាន បើទោះបីជាយូរយ៉ាងណាក៏ដោយ។ ប្រសិនបើបាត់ដោយមូលហេតុ ដែលធ្វើឲ្យរាំងរដូវហើយ តែនៅគ្មានរដូវទៀតនោះ នាងត្រូវរង់ចាំអ៊ីដខ្ហះរយៈពេលមួយឆ្នាំ គិតចាប់ពីពេលមានជម្ងឺ ដែលធ្វើឲ្យរាំងរដូវ ឬឈប់បំបៅកូននោះ។ស្របទៅនឹងនីតិវិធីរបស់សាសនវិទូ អ៊ីមាំមូស្លីមដែលបាន លើកឡើងថា៖ "ក្នុងករណីបាត់មូលហេតុ ហើយនៅតែរាំងរដូវទៀតនោះ គឺគេចាត់ទុកដូចជាស្ត្រីដែលរាំងរដូវដោយគ្មានមូលហេតុច្បាស់លាស់ដែរ" ។ ដូច្នេះពួកគេត្រូវរង់ចាំរយៈពេលអ៊ីដខ្ហះចំនួនមួយឆ្នាំពេញគឺហាក់បីដូចជាអ្នកដែលមានផ្ទៃពោះភាគច្រើន។ ព្រោះរយៈពេល៩ ខែបន្ថែម ពីលើរយៈពេលរង់ចាំអ៊ីដខ្ហះ៣ ខែទៀត។ ចំណែកការលែងលះដែលធ្វើឡើង ក្រោយការរៀបអាពាហ៍ពិពាហ៍មិនទាន់បានរួមភេទនោះ គឺពុំចាំបាច់រង់ចាំរយៈពេលអ៊ីដខ្ហះនោះឡើយ។ ដូចជាអល់ឡោះបានមានបន្ទូលថា៖

(يَا أَيُّهَا الَّذِيْنَ ءَامَنُوْا إِذَا نَكَحْتُمُ الْمُؤْمِنَاتِ ثُمَّ طَلَّقْتُمُوْهُنَّ مِنْ قَبْلِ أَنْ تَمَسُّوْهُنَّ فَمَا لَكُمْ عَلَيْهِنَّ مِنْ عِدَّةٍ تَعْتَدُّوْنَهَا) سورة الأحزاب 49

<u>មានន័យថា</u>៖ *ឱពួកអ្នកដែលមានជំនឿ! ប្រ សិនបើពួកអ្នកបានរៀបអាពាហ៍ពិពាហ៍ ជាមួយស្ត្រីដែលមានជំនឿ បន្ទាប់មកអ្នកចង់លែងលះនាងមុនធ្វើការរួមភេទ គឺពួកអ្នកអាចលែងលះបាន ដោយពុំចាំបាច់ឲ្យពួកនាងរង់ចាំរយៈពេលអ៊ីដឌ្ហះឡើយ។*

**៩-ការវិនិច្ឆ័យចំពោះភាពបរិសុទ្ធនៃគភ៌ ៖**

ការវិនិច្ឆ័យពីភាពបរិសុទ្ធនៃគភ៌ ជាករណីចាំបាច់ ហើយមានច្រើនករណីដូចជា បុគ្គលដែលស្លាប់ចោលភរិយា ដែលកំពុងមានគភ៌ ទារកដែលនៅក្នុងផ្ទៃនោះ ត្រូវមានចំណែកទទួលមរតកពីខ្មោចឪពុក។ ប្រសិនបើ ស្ត្រីនោះយកប្ដីថ្មី ប្ដីនោះមិនអាចរួមភេទជាមួយនាងបានទេ លុះត្រាតែស្ត្រីនោះមករដូវ ឬដឹងច្បាស់ថាមាន ឬគ្មានផ្ទៃពោះជាមុនសិន ដើម្បីងាយស្រួលកំណត់ថា តើទារកនោះជាកូនរបស់នាងជាមួយប្ដីដែលស្លាប់ទៅ ឬប្ដីថ្មីរបស់នាង ហើយតើទទួលមរតកពីខ្មោចឪពុកបានដែរ ឬទេ បើសិនជាទារកនោះជាកូនរបស់នាងជាមួយប្ដីទីមួយ កូននោះនឹងត្រូវទទួលបានចំណែកមរតក។

ផ្ទុយទៅវិញ បើសិនជាការវិនិច្ឆ័យនោះបង្ហាញឲ្យឃើញថា ស្ត្រីនោះបានមករដូវ ដូច្នេះពុំមានទារកដែលនឹងត្រូវទទួលមរតក ពីខ្មោចឪពុកនោះឡើយ។

**១០-ការងូតទឹក៖**

ចាំបាច់ចំពោះស្ត្រីដែលបានមករដូវ ពេលជ្រះស្អាតពីឈាមរដូវ ត្រូវងូតទឹកជម្រះសំអាតសព្វរាងកាយ។

យោងតាមប្រសាសន៍របស់ណាពីមូហាំម៉ាត់ ទៅកាន់ហ្វាទីម៉ះ ពិ្វនទី អាព្វីហ៊ុព្វៃស្ស៊ថា៖

**قَالَ النَّبِيُّ صلى الله عليه وسلم: (فَإِذَا أَقْبَلَتِ الْحَيْضَةُ فَدَعِي الصَّلاَةَ وَإِذَا أَدْبَرَتْ فَاغْتَسِلِي وَصَلِّيْ) رواه البخاري**

<u>មានន័យថា៖</u> *នៅពេលណាដែលមករដូវ ចូរអ្នកផ្អាកសឡាត ហើយពេលណាអ្នកជ្រះស្អាតពីឈាមរដូវ ចូរអ្នកងូតទឹកសំអាត និងប្រតិបត្តិសឡាត។*

ប្រការដែលចាំបាច់បំផុតក្នុងការងូតទឹក ត្រូវចាក់ទឹកស្រោច ឲ្យបានសព្វរាងកាយ ឲ្យជ្រាបទឹកដល់ស្បែកក្បាល។ កាន់តែប្រសើរជាងនេះទៅទៀត គួរធ្វើតាមលក្ខណៈដែលមាននៅក្នុងប្រសាសន៍របស់ណាពីមូហាំម៉ាត់ នៅពេលដែលអាស្មាក ដែលជាកូនស្រីរបស់សាកាល់បានសួរគាត់ អំពីការងូតទឹកពេលជ្រះស្អាតពីឈាមរដូវ ពេលនោះលោកក៏បានតបទៅវិញថា៖

**قَالَ النَّبِيُّ صلى الله عليه وسلم:( تَأْخُذُ إِحْدَاكُنَّ مَاءَهَا وَسِدْرَتَهَا فَتَطَهَّرُ فَتُحْسِنُ الطُّهُوْرَ، ثُمَّ تَصُبُّ عَلَى رَأْسِهَا فَتَدْلُكُهُ دَلْكًا شَدِيْدًا حَتَّى تَبْلُغَ شُئُوْنَ رَأْسِهَا ثُمَّ تَصُبُّ عَلَيْهَا الْمَاءَ ثُمَّ**

**تَأْخُذُ فِرْصَةً مُمَسَّكَةً أَيْ قِطْعَةَ قُمَاشٍ فِيْهَا مِسْكٌ فَتَطَهَّرُ بِهَا، فَقَالَتْ أَسْمَاءُ: كَيْفَ أَتَطَهَّرُ بِهَا؟ فَقَالَ: سُبْحَانَ اللهُ فَقَالَتْ عَائِشَةُ لَهَا: تَتَبَّعِيْنَ أَثَرَ الدَّمِ) رواه مسلم**

<u>មានន័យថា៖</u> *នាងត្រូវយកទឹក និងស្លឹកពុទ្រា មកលាងជម្រះសំអាត បន្ទាប់មកចាក់ទឹកស្រោចពីលើក្បាល ហើយដុសឈ្លីឲ្យសព្វរហូត ជ្រាបទឹកដល់ស្បែកក្បាល រួចងូតទឹកធម្មតា លាងជម្រះកាយ បន្ទាប់មកទៀតយកក្រណាត់លាបទឹកអប់ទៅជូតកន្លែងនោះ។ ពេលនោះអាស្មាកក៏បានសួរទៀតថាៈ តើនាងខ្ញុំ ជូតសំអាតដោយរបៀបណា? ណាពីមូហាំម៉ាត់ បានមានប្រសាសន៍ថាៈ ស្អាតស្អំហើយអល់ឡោះ! ពេលនោះអាអ៊ីសះបា ននិយាយទៅកាន់នាងថាៈ អ្នកជូតសំអាតតាមស្នាមឈាមនោះទៅ!* ។

ណាពីមូហាំម៉ាត់បានមានប្រសាសន៍ទៀតថា៖

**(لاَ إِنَّمَا يَكْفِيْكِ أَنْ تَحْثِّيْ عَلَى رَأْسِكِ ثَلاَثَ حَثَيَاتٍ ثُمَّ تُفِيْضِيْنَ عَلَيْكِ الْمَاءَ فَتُطَهِّرِيْنَ)**

<u>មានន័យថា៖</u> *មិនបាច់ទេ! អ្នកគ្រាន់តែយកទឹក មកជ្រងសក់ក្បាលបីដង រួចចាក់ទឹកស្រោចស្រប់លើខ្លួន និងលាងជម្រះឲ្យស្អាតជាការស្រេច* ។

ចំពោះអ្នកដែលបានជ្រះស្អាតពីឈាមរដូវចំពេលសឡាតចាំបាច់ត្រូវរូតរះទៅងូតទឹក ដើម្បីធ្វើការប្រតិបត្តិសឡាតឲ្យទាន់ពេលវេលា។ ប្រសិនបើកំពុងធ្វើដំណើរ ហើយគ្មានទឹក ឬក៏មានទឹកតែមិនអាចប្រើ

ប្រាស់ទឹកបាន ព្រោះខ្លាចមានការប៉ះពាល់ដែលអាចនាំឲ្យមានគ្រោះថ្នាក់ ឬមិនអាចប្រើប្រាស់ទឹកបាន ដោយមូលហេតុមានជម្ងឺ នោះគេគ្រាន់តែតាយ៉ាំមុំ[8]ដូចជាតាយ៉ាំមុំដើម្បីប្រតិបត្តិសឡាតជាកិច្ច បណ្ដោះអាសន្នទំរាំជាសះស្បើយពីជម្ងឺ ឬមានទឹកប្រើប្រាស់ឡើងវិញ។ មានស្ត្រីមួយចំនួនបានជ្រះស្អាតពីឈាមរដូវចំម៉ោងសឡាត តែបែរជាពន្យាការងូតទឹក រហូតហួសម៉ោងសឡាត ដោយសំអាងថា នាងមិនមានពេលគ្រប់គ្រាន់ ដើម្បីងូតទឹកសំអាតខ្លួន ប៉ុន្តែនេះពុំមែនជាលេស ឬហេតុផលឡើយ ព្រោះគេអាចធ្វើដោយសង្ខេបត្រឹមតែធ្វើតាមករណីយកិច្ចងូតទឹក រួចបំពេញសឡាតឲ្យទាន់ពេលវេលា លុះមានពេលគ្រប់គ្រាន់ហើយ ទើបនាងអាចសំអាត ខ្លួនប្រាណតាមសម្រួល។

## ជំពូកទី ៥

## ឈាមជម្ងឺ (អ៊ីស្ទីហាដោះ) និងបញ្ញត្តិច្បាប់របស់វា

[8] ការយកដី ឬខ្សាច់ស្ងួតដែលជ្រះស្អាតមកប្រើជំនួសការងូតទឹក។

អ៊ីស្ទីហាដ្ហោះ ជាឈាមជម្ងឺដែលធ្លាក់ជាបន្តបន្ទាប់ កើតឡើង ចំពោះស្ត្រីភេទ និងមាន រយៈពេលយូរអង្វែង មិនងាយនឹងបាត់ដូច ជាមួយថ្ងៃ ពីរថ្ងៃក្នុងមួយខែនោះទេ។

**ករណីទី១**: ឈាមធ្លាក់មកមិនដាច់ គឺជាឈាមជម្ងឺ ដូចជាមានរៀប រាប់ក្នុងសៀវភៅកម្រងសុក្រឹតរបស់សាសនវិទូ អាល់-ពូខរីដែលបាន ពាំនាំសម្តីរបស់អាអ៊ីសះថា៖

**لحديث عائشة رضي الله عنها قالَتْ: (قالَتْ فاطِمَةُ بِنْتِ أَبِيْ حُبَيْشٍ لِرَسُوْلِ اللهِ صلى الله عليه وسلم يَارَسُوْلَ اللهِ إِنِّيْ لا أَطْهُرُ. وفي رواية: أَسْتَحَاضُ فَلا أَطْهُرُ.**

<u>មានន័យថា</u>៖ *ហ្វាទីម៉ះ កូនស្រីរបស់អាពួីហ៊ូព្វៃស្ហ បាននិយាយទៅ កាន់រ៉ស៊ូលរបស់អល់ឡោះថា: ឱរ៉ស៊ូលុលឡោះ ខ្ញុំមិនជ្រះស្អាត សោះ! ហើយបើតាមកំណត់ត្រាផ្សេងទៀតបានឲ្យដឹងថា: ខ្ញុំនៅតែ បន្តមានឈាមជម្ងឺ មិនជ្រះស្អាតសោះ!* ។

**ករណីទី២**: ការបាត់ឈាមជម្ងឺក្នុងរយៈខ្លីដូចជាកំណត់ត្រាមួយបាន ឲ្យដឹងថា ហាំណាស់កូនស្រីរបស់ជួះសិន បានមកជួបណាពីមូហាំ ម៉ាត់ ហើយបានប្រាប់លោកថា៖

**لحديث حَمْنَةَ بِنْتِ جَحْشٍ جَاءَتْ إِلَى النَّبِيِّ صلى الله عليه وسلم فَقالَتْ:(يَارَسُوْلَ اللهِ إِنِّيْ أَسْتَحَاضُ حَيْضَةً كَبِيْرَةً شَدِيْدَةً )** *رواه إمام أحمد وأبو داود والتر مذي*

<u>មានន័យថា</u>៖ *ឱរ៉ស៊ូលរបស់អល់ឡោះ! ពិតប្រាកដនាងខ្ញុំមានឈាម ជម្ងឺធ្លាក់មកខ្លាំងមែនទែន* ។

## លក្ខណៈផ្សេងៗនៃអ្នកមានឈាមជម្ងឺ

ចំពោះស្រ្តីដែលមានឈាមជម្ងឺមាន៣ យ៉ាង៖

1. **ស្រ្តីមករដូវទៀងទាត់មុនពេលមានឈាមជម្ងឺ**

ក្នុងករណីនេះ ត្រូវត្រឡប់ទៅមើលរយៈពេលទៀងទាត់ នៃឈាមរដូវរបស់ខ្លួនកាលពីមុន រួចកំណត់រយៈពេលដែលកំពុងធ្លាក់នាពេលបច្ចុប្បន្ន និងអនុវត្តឲ្យដូចករណីឈាមរដូវនោះ ក្រៅពីនេះត្រូវអនុវត្តដូចករណីឈាមជម្ងឺវិញ។

ឧទាហរណ៍៖ ស្រ្តីម្នាក់តែងតែមករដូវជាប្រចាំរយៈពេល៦ ថ្ងៃជារៀងរាល់ដើមខែ បន្ទាប់មកករណីឈាមជម្ងឺ បានកើតឡើងចំពោះនាងដែលជាហេតុធ្វើឲ្យមានឈាមធ្លាក់លើសពីរយៈពេល៦ថ្ងៃ។ ដូច្នេះរយៈពេលដែលនៃការមករដូវរបស់នាង គេគិតត្រឹមតែ៦ថ្ងៃប៉ុណ្ណោះ ក្រៅពីនេះគេចាត់ទុកថា ជារយៈពេលដែលនាងធ្លាក់ឈាមជម្ងឺ។ ដូចជាមានកំណត់ត្រាមួយបានឲ្យដឹងតាមរយៈអាអ៊ីសះថា៖

لحديث عائشة رضي الله عنها، أَنَّ فَاطِمَةَ بِنْتِ أَبِيْ حُبَيْشٍ قَالَتْ:**"يَا رَسُوْلَ اللهِ إِنِّيْ أَسْتَحَاضُ فَلاَ أَطْهُرُ أَفَأَدَعُ الصَّلاَةَ؟ قَالَ: لاَ، إِنَّ ذَلِكَ عِرْقٌ،وَلَكِنْ دَعِيْ الصَّلاَةَ قَدْرَ الأَيَّامِ الَّتِيْ كُنْتِ تَحِيْضِيْنَ فِيْهَا ثُمَّ اغْتَسِلِيْ وَصَلِّيْ"رواه البخاري ، وفي صحيح مسلم: أَنَّ النَّبِيَّ صلى الله عليه وسلم قَالَ لِأُمِّ حَبِيْبَةِ بِنْتِ جَحْشٍ: "اُمْكُثِيْ قَدْرَ مَا كَانَتْ تَحْبَسُكِ حَيْضَتُكِ ثُمَّ اغْتَسِلِيْ وَصَلِّيْ"**

មានន័យថា៖ *ហ្វាទីម៉ះ កូនរបស់អាពីហ៊ូប៉ៃស្ហ បាននិយាយថា ៖"ឱ រ៉ស៊ូលរបស់អល់ឡោះ! នាងខ្ញុំនៅតែបន្តមានឈាមជម្ងឺធ្លាក់មកមិនជ្រះស្អាតសោះ តើនាងខ្ញុំគួរផ្អាកសឡាតដែរ ឬទេ? លោកបានតបវិញថា៖ ទេ, នោះគឺជាឈាមជម្ងឺ។ តែអ្នកត្រូវផ្អាកសឡាតក្នុងរយៈពេលប៉ុន្មានថ្ងៃដែលអ្នកធ្លាប់មករដូវប៉ុណ្ណោះ បន្ទាប់មកអ្នកត្រូវងូតទឹកសំអាតខ្លួន ហើយប្រតិបត្តិសឡាតជាធម្មតាវិញចុះ*។

ក្នុងសៀវភៅកម្រងសុក្រឹតរបស់សាសនវិទូម៉ូស្លីមបានឲ្យដឹងថា *រ៉ស៊ូលរបស់អល់ឡោះបានមានប្រសាសន៍ទៅកាន់ អ៊ុំមូហាពីព្ហះ កូនជះសិនថា: "ចូរផ្អាកក្នុងរយៈពេលប៉ុន្មាន(ថ្ងៃ) ដែលអ្នកធ្លាប់មានរដូវប៉ុណ្ណោះ ក្រៅពីនេះ អ្នកងូតទឹកសំអាតខ្លួន ហើយប្រតិបត្តិសឡាតឡើងវិញជាធម្មតាចុះ*។

យោងតាមអំណះអំណាងខាងលើ វាបានបង្ហាញយើងឃើញថា ចំពោះស្ត្រីដែលមានឈាមជម្ងឺជាប្រចាំនោះ ត្រូវតែកំណត់រយៈពេលឈាមរដូវ ដូចដែលខ្លួនធ្លាប់មករដូវពីមុនមក ក្រៅពីនេះត្រូវងូតទឹកសំអាតខ្លួន ហើយត្រូវប្រតិបត្តិសួឡាតជាធម្មតាឡើងវិញ។

## 2. ស្ត្រីដែលមករដូវមិនទៀងទាត់តាំងពីមុនពេលមានឈាមជម្ងឺ

ក្នុងករណីនេះ គេអាចបែងចែករវាងឈាមរដូវ និងឈាមជម្ងឺ ដោយគេសម្គាល់លើលក្ខណៈឈាមមានពណ៌ខ្មៅខាប់ ឬមាន ក្លិន។ នេះបើសិនជាអាចបែងចែកដូច្នេះបាន គេនឹងអាចកំណត់រយៈពេលមករដូវ និងត្រូវអនុវត្តឲ្យដូចករណី ឈាមរដូវក្នុងពេលធម្មតា។ ក្រៅពីនេះ គេចាត់ទុកថា វាជារយៈពេលដែលធ្លាក់ឈាមជម្ងឺនិងត្រូវ

អនុវត្តតាមករណីឈាមជម្ងឺនោះផងដែរ។ ឧទាហរណ៍ៈស្ត្រីម្នាក់មានធ្លាក់ឈាមលើកដំបូង ហើយឈាមនោះធ្លាក់មិនដាច់សោះ ប៉ុន្តែនាងអាចសម្គាល់បានថា រយៈពេល១០ថ្ងៃជាឈាមពណ៌ខ្មៅ ហើយក្រៅពីនេះជាឈាមពណ៌ក្រហមធម្មតា ឬនាងមានឈាមក្នុងរយៈពេល១០ថ្ងៃដំបូងជាឈាមដែលមានលក្ខណៈខាប់ ហើយក្រៅពី នេះជាឈាមរាវធម្មតា។ ម្យ៉ាងវិញទៀត ឈាមដែលធ្លាក់មកនោះ ក្នុងរយៈ១០ ថ្ងៃដំបូងមានក្លិន បន្ទាប់ពីនោះអត់មានក្លិនអ្វីទេ។

ដូច្នេះឧទាហរណ៍ខាងលើឆ្លុះបញ្ចាំងឲ្យឃើញថា ចំពោះស្ត្រីដែលមករដូវមិនទៀងទាត់ ហើយមានឈាមជម្ងឺនោះ ត្រូវធ្វើការកំណត់សម្គាល់រដូវរបស់ខ្លួន ដោយផ្អែកលើលក្ខណៈឈាមដែលមានពណ៌ខ្មៅ ខាប់ ឬមានក្លិន។

ចំពោះឈាមដែលមិនមានលក្ខណៈទាំងបីខាងលើចាត់ទុកជាឈាមជម្ងឺ។

ដូចជាមានការរៀបរាប់អំពីរឿងនេះ នៅក្នុងប្រសាសន៍របស់ណាពីមូហាំម៉ាត់៖

**لِقَوْلِ النَّبِيِّ صلى الله عليه وسلم لِفَاطِمَةَ بِنْتِ أَبِيْ حُبَيْشٍ إِذَا كَانَ دَمُ الْحَيْضِ فَإِنَّهُ أَسْوَدُ يُعْرَفُ، فَإِذَا كَانَ ذَلِكَ فَأَمْسِكِيْ عَنِ الصَّلاَةِ فَإِذَا كَانَ الْآخَرَفَتَوَضَّئِيْ وَصَلِّيْ فَإِنَّمَا هُوَ عِرْقٌ.** رواه أبو داود والنسائي.

<u>មានន័យថា៖</u> *ប្រសិនបើឈាមរដូវនោះ ប្រាកដជាមានពណ៌ខ្មៅដែលគេស្គាល់យ៉ាងច្បាស់ ប្រសិនបើឃើញបែបនេះ ចូរអ្នកផ្អាក*

*សទ្បាត តែប្រសិនបើផ្សេងពីនេះ ចូរអ្នកយកទឹកវុឌ្ហុ ហើយប្រតិបត្តិសទ្បាតចុះ ព្រោះវាជាឈាមជម្ងឺទេ ។*

**៣-ស្ត្រីដែលមានរដូវមិនទៀងទាត់ និងគ្មានលក្ខណៈសម្គាល់ ច្បាស់លាស់**

ចំពោះស្ត្រីដែលមានរដូវមិនទៀងទាត់ និងគ្មានលក្ខណៈសម្គាល់ច្បាស់លាស់ ហើយមានឈាមជម្ងឺកើតឡើងជាមួយគ្នាផងនោះ គឺគេអាចកំណត់រយៈពេលនៃការមករដូវ ដោយអនុវត្តតាមសភាពធម្មតារបស់ស្ត្រីភេទ គឺរយៈពេល៦ថ្ងៃ ឬ៧ថ្ងៃរៀងរាល់ខែដោយចាប់ផ្តើមគិតចាប់តាំងពីថ្ងៃដំបូងដែលស្ត្រីនោះចាប់ផ្តើមមករដូវរហូតដល់ថ្ងៃ ទី៦ ឬថ្ងៃទី៧ ក្រៅពីនេះគេចាត់ទុកវាជារយៈពេលដែល នាងធ្លាក់ ឈាមជម្ងឺ។ ឧទាហរណ៍ថា ស្ត្រីម្នាក់ចាប់ផ្តើមមករដូវនៅថ្ងៃទី៥នៃដើមខែ ហើយឈាមនោះនៅតែបន្តធ្លាក់មកមិនឈប់។ ដោយនាងមិនអាចបែងចែកឲ្យបានដាច់រវាងឈាមរដូវ និងឈាមជម្ងឺដូច្នេះនាងអាចកំណត់រយៈ ពេលនៃឈាមរដូវរបស់នាងដោយគិតចាប់ ពីថ្ងៃទី៥ រហូតដល់រយៈពេល៦ ថ្ងៃ ឬ៧ ថ្ងៃរៀងរាល់ខែ ហើយក្រៅពីថ្ងៃទាំងនេះ វាជារយៈពេលដែលនាងធ្លាក់ឈាមជម្ងឺ។

ដូចជាមានការរៀបរាប់អំពីបញ្ហានេះក្នុងកំណត់ត្រាមួយ ដែលបានឲ្យដឹងដោយហាំណាស់ ជាកូនស្រីរបស់ជួះស៊ិន បាននិយាយប្រាប់រ៉សូល របស់អល់ឡោះថា៖

**لحديث حَمْنَةَ بِنْتِ جَحْشٍ جَاءَتْ إِلَى النَّبِيِّ صلى الله عليه وسلم فَقَالَتْ:(يَارَسُوْلَ اللهِ إِنِّي أَسْتَحَاضُ حَيْضَةً كَبِيْرَةً شَدِيْدَةً فَمَا تَرَى فِيْهَا؟ قَدْ مَنَعَتْنِي الصَّلاَةَ وَالصِّيَامَ ، فَقَالَ:أَنْعَتُ لَكِ" أَصِفُ لَكِ**

اسْتِعْمَالَ الْكُرْسُفِ" وَهُوَ قُطْنٌ " تَضَعِيْنَهُ عَلَى الْفَرْجِ، فَإِنَّهُ يُذْهِبُ الدَّمَ، قَالَتْ: هُوَ أَكْثَرُ مِنْ ذَلِكَ. وَفِيْهِ قَالَ: " إِنَّمَا هَذَا رَكْضَةٌ مِنْ رَكَضَاتِ الشَّيْطَانِ فَتَحِيْضِيْ سِتَّةَ أَيَّامٍ أَوْ سَبْعَةً فِيْ عِلْمِ اللهِ تَعَالَى، ثُمَّ اغْتَسِلِيْ حَتَّى إِذَا رَأَيْتِ أَنَّكِ قَدْ طَهُرْتِ وَاسْتَنْقَيْتِ فَصَلِّيْ أَرْبَعًا وَعِشْرِيْنَ أَوْ ثَلاثًا وَعِشْرِيْنَ لَيْلَةً وَأَيَّامِهَا وَصُوْمِيْ "رواه إمام أحمد وأبو داود والترمذي.

មានន័យថា៖ *ឱរ៉សូលរបស់អល់ឡោះ! ពិតប្រាកដនាងខ្ញុំមានឈាមជម្ងឺធ្លាក់ មកច្រើនមែនទែន តើរ៉សូលុលឡោះយល់យ៉ាងណាដែរ? ឈាមនេះនៅតែ ហូរមកជាប់ធ្វើឲ្យនាងខ្ញុំមិនអាចប្រតិបត្តិសឡាត និងបួសបានឡើយ។ លោក បានតបវិញថា: ខ្ញុំនឹងប្រាប់អ្នកពីរបៀបប្រើប្រាស់សំលីទ្រាប់លើទ្វារមាស ដែលអាចបឺតយកឈាមនោះ។ នាងបានតទៅវិញថា: ឈាមនោះធ្លាក់មកច្រើនពេក។ ក្នុងកំណត់ត្រាមួយទៀតបានឲ្យដឹងថា: "នោះគឺជារបស់បិសាច ប៉ុណ្ណោះ" ។ ឈាមរដូវដែលអល់ឡោះបានកំណត់នោះមានតែរយៈពេល ៦ថ្ងៃ ឬ៧ថ្ងៃប៉ុណ្ណោះ។បន្ទាប់មកអ្នកត្រូវងូតទឹកសំអាតខ្លួនប្រាណ លុះអ្នកបានឃើញថា ខ្លួនអ្នកបានជ្រះស្អាតឡើងវិញហើយនោះ អ្នកត្រូវប្រតិបត្តិសឡាត និងបួសរយៈពេល២៤ ថ្ងៃ ឬ២៣ ថ្ងៃចុះ។*

ប្រសាសន៍របស់ណាពីមូហាំម៉ាត់ដែលបានលើកឡើងថា: រយៈពេល៦ ថ្ងៃ ឬ៧ ថ្ងៃ។ នេះពុំមែនជាជម្រើសរបស់ស្ត្រីគ្រប់រូបនោះទេ តែជាការកំណត់ក្នុងករណីចាំបាច់ប៉ុណ្ណោះ។

ដូច្នេះស្ត្រីដែលមានរដូវមិនទៀងទាត់ហើយពុំមានលក្ខណៈសម្គាល់នោះទេ នាងអាចពិនិត្យមើលលក្ខណៈដូចគ្នា ឬស្រដៀងគ្នា មានតាំងពីរូបរាង អាយុ សាច់សារលោហិត និងការកំណត់សម្គាល់ផ្សេងទៀតរវាងនាង និងស្ត្រីដ៏ទៃ។ បើឃើញថាស្ត្រីដែលមានលក្ខណៈស្រដៀងគ្នានោះ មានរដូវរយៈពេល៦ ថ្ងៃ ដូច្នេះត្រូវកំណត់រដូវរបស់នាងក្នុងរយៈពេល ៦ ថ្ងៃដែរ។ ប្រសិនបើរយៈពេល៧ ថ្ងៃ ត្រូវកំណត់រយៈពេល៧ ថ្ងៃដូច គ្នា។បែបបទនៃអ្នកដែលមាន លក្ខណៈស្រដៀងគ្នានឹងអ្នកមានឈាមជម្ងឺ ជួនកាលឈាមអាចហូរចេញពីទ្វារមាសដោយមូលហេតុនៃ ការវះកាត់ស្បូន ចងស្បូន និងមូលហេតុផ្សេងទៀត ដែលអាចចែក ចេញជាពីរផ្នែកផ្សេងគ្នាដូចតទៅ៖

១-ចំពោះស្ត្រីដែលទទួលការវះកាត់ស្បូនទាំងស្រុង ឬចងស្បូន នាងអត់មានរដូវទេ។ ដូច្នេះនាងមិនអាចអនុវត្តដូចក្នុងករណីឈាមរដូវបានឡើយ។ ប្រសិនបើនាងឃើញមានឈាមក្រហមស្រាលល្អក់ ឬសើម ក្រោយពីជ្រះស្អាត នាងមិនត្រូវផ្អាកសឡាត និងបួសនោះទេ នាងអាចធ្វើការរួមភេទជាមួយប្ដីរបស់នាង បានធម្មតាដោយមិនចាំបាច់ងូតទឹកសំអាតខ្លួនពីឈាមប្រភេទនេះនោះឡើយ។ ប៉ុន្តែនាងចាំបាច់ត្រូវលាងសំអាត ហើយយកក្រណាត់មកទ្រាប់ន្លែង ទ្វារមាសរបស់នាងដើម្បីកុំឲ្យឈាមហូរប្រលាក់ខ្លួនរបស់នាង។
ម្យ៉ាងទៀតនាងត្រូវយកទឹកវូឌូ (យកទឹកសំពះយ៉ាំង) នៅរៀងរាល់ពេលដែលនាងចង់ប្រតិបត្តិការស្ឡាតហ្វារទូ ក្រៅពីនេះនាងចង់យក ទឹកវូឌូពេល ណាក៏បានដែរ។

២-ចំពោះស្ត្រីដែលទទួលការវះកាត់ តែគេមិនដឹងច្បាស់ថានាងអាចមាន ឬមិនអាចមានរដូវនោះ គឺត្រូវអនុវត្តដូចករណីស្ត្រីមានឈាមជម្ងឺដែរ។

ដូចជាណាពីមូហាំម៉ាត់បានមានប្រសាសន៍ទៅកាន់ ហ្វាទីម៉ះ កូនស្រីរបស់អាព្ញហ៊ុំព្ចៃស្ហថា៖

قوله صلى الله عليه وسلم لفاطمة بنت حبيش: "إِنَّمَا ذَلِكَ عِرْقٌ وَلَيْسَ بِالْحَيْضَةِ فَإِذَا أَقْبَلَتِ الْحَيْضَةُ فَاتْرُكِي الصَّلاَةَ "

<u>មានន័យថា៖</u> *ពិតប្រាកដ នោះគឺជាឈាមជម្ងឺ មិនមែនជាឈាមរដូវទេ ពេលអ្នកមានរដូវ អ្នកត្រូវផ្អាកសឡាត។*

ប្រសាសន៍របស់លោកមានន័យថា ស្ត្រីដែលមានរដូវក៏អាចមានឈាមជម្ងឺដែលអាចកើតមានឡើង និងអាចបាត់ទៅវិញ។ ចំណែកស្ត្រីដែលគ្មានរដូវវិញ គឺឈាមដែលធ្លាក់មកគេហៅថាឈាមជម្ងឺ។

៙៙៙❋៙៙

## ឈាមជម្ងឺ និងបញ្ញត្តិច្បាប់

យើងបានដឹងរួចមកហើយអំពីឈាមរដូវ និងឈាមជម្ងឺ ហើយពេលណាគេចាត់ទុកឈាមនោះជាឈាមរដូវ ពេលណាគេចាត់ទុកឈាមនោះជាឈាមជម្ងឺនិងបញ្ញត្តិច្បាប់របស់វា។ ចំពោះស្ត្រីដែលមានឈាមជម្ងឺ គឺដូចស្ត្រីដែលជ្រះស្អាតពីឈាមរដូវ គ្មានភាពខុសគ្នារវាងអ្នកមានឈាមជម្ងឺ និងអ្នកជ្រះស្អាតពីឈាម រដូវនោះឡើយ លើកលែងតែចំនុចមួយចំនួនដែលគេបានកំណត់ ដូចខាងក្រោម៖

១-អ្នកដែលមានឈាមជម្ងឺ ចាំបាច់ត្រូវយកទឹកវូឌ្ហុរៀងរាល់ពេលដែលគេចង់ធ្វើការប្រតិបត្តិសឡាត។

ដូចជាណាពីមូហាំម៉ាត់លោកបានមានប្រសាសន៍ទៅ កាន់ហ្វាទីម៉ះ កូនរបស់ហ៊ូព្វៃស្ហថា៖

قوله صلى الله عليه وسلم لفاطمة بنت حبيش:" **ثُمَّ تَوَضَّئِي لِكُلِّ صَلاَةٍ**" *البخاري*

<u>មានន័យថា៖</u> *បន្ទាប់មកអ្នកត្រូវយកវូឌ្ហុ រៀងរាល់ពេលប្រតិបត្តិការសឡាត។*

២-អ្នកមានឈាមជម្ងឺត្រូវសំអាតស្នាមឈាម ហើយយកក្រណាត់ ឬសំឡីទ្រាប់កន្លែងទ្វាមាស មុននឹងយកវូឌ្ហុ។

ដូចជាណាពីមូហាំម៉ាត់បានមានប្រសាសន៍ទៅកាន់ហាំណាស់ថា៖

**قوله صلى الله عليه وسلم لِحَمْنَةَ: " أَنْعَتُ لَكِ الْكَرْسَفَ فَإِنَّهُ يُذْهِبُ الدَّمَ قَالَتْ: فَإِنَّهُ أَكْثَرُ مِنْ ذَلِكَ ، قَالَ فَاتَّخِذِي ثَوْبًا، قَالَتْ: هُوَ أَكْثَرُ مِنْ ذَلِكَ ، قَالَ : فَتَلَجَّمِي "**

<u>មានន័យថា៖</u> *ខ្ញុំនឹងប្រាប់អ្នកអំពីរបៀបប្រើប្រាស់សំឡី ទ្រាប់លើទ្វារមាស ដែលអាចបឺតយកឈាមនោះ។ នាងតបទៅវិញថា ឈាមនោះធ្លាក់មកច្រើនពេក។ លោកនិយាយថា: យកក្រណាត់ទប់ថែមទៀត។ នាងឆ្លើយទៀតថា: នៅតែមិនអាចទប់ឈាមនោះបាន។ លោកប្រាប់ថា: រកវិធីទប់វាទៅ។*

មានប្រសាសន៍របស់ណាពីមូហាំម៉ាត់មួយទៀតដែលបញ្ជាក់ថា ឈាមនោះ មិនប៉ះពាល់ដល់ស្ឡូឡាតរបស់ស្រ្តី ដោយលោកបានមានប្រសាសន៍ទៅកាន់ ហ្វាទីម៉ះ កូនអាពីហ៊ូពួះ

قوله صلى الله عليه وسلم لفاطمة بنت حبيش: **"اِجْتَنِبِيْ الصَّلاَةَ أَيَّامَ حَيْضِكِ ثُمَّ اغْتَسِلِيْ وَتَوَضَّئِيْ لِكُلِّ صَلاَةٍ ثُمَّ صَلِّيْ وَإِنَّ قَطَرَ الدَّمَ عَلَى الْحَصِيْرِ"** رواه أحمد وابن ماجه

<u>មានន័យថា៖</u> *ចូរអ្នកផ្អាកស្ឡូឡាតសិនចុះ ក្នុងកំឡុងពេលដែលអ្នកកំពុងមករដូវ បន្ទាប់មកត្រូវងូតទឹកសំអាតខ្លួន និងយកវូឌួរៀងរាល់ពេលប្រតិបត្តិស្ឡូឡាត ហើយចូរប្រតិបត្តិស្ឡូឡាតចុះទោះបីជាឈាមនោះហូរជាតំណក់លើកន្ទេលក៏ដោយ ។*

៣-ការរួមភេទ :

បញ្ហានេះមានទស្សនៈផ្សេងគ្នាក្នុងចំណោម សាសនវិទូអ៊ីស្លាមថា តើគួរអនុញ្ញាតឲ្យប្តីធ្វើការរួមភេទជាមួយប្រពន្ធ ដែលមានឈាមជម្ងឺដែរ ឬទេ ប្រសិនបើការរួមភេទនោះមិនមានផលអាក្រក់ដល់ប្រពន្ធទេនោះ? តាមពិតការរួមភេទជាមួយប្រពន្ធដែលមានឈាមជម្ងឺនោះត្រូវបានអនុញ្ញាត ព្រោះនៅជំនាន់ណាពីមានស្ត្រីភាគច្រើនអាយុ១០ឆ្នាំ ឬលើសពីនេះតែងមានឈាមជម្ងឺហើយពុំមានបញ្ញត្តិច្បាប់ណាហាមឃាត់ការរួមភេទនោះឡើយ ទាំងក្នុងបន្ទូលរបស់អល់ឡោះជាម្ចាស់និងប្រសាសន៍របស់ណាំពីមូហាំម៉ាត់។

ប៉ុន្តែត្រូវបានហាមឃាត់ការរួមភេទជាមួយស្ត្រី ដែលកំពុងមករដូវទៅវិញ។ ដូចអល់ឡោះជាម្ចាស់បានមានបន្ទូលថា៖

قال تعالى: (فَاعْتَزِلُوْا النِّسَاءَ فِى الْمَحِيْضِ)

سورة البقرة 222

<u>មានន័យថា</u>៖ *ដូច្នេះ ចូរពួកអ្នកជៀសវាង ការរួមភេទជាមួយប្រពន្ធខណៈពេលដែលនាងកំពុងតែមករដូវ។*

ក្រៅពីឈាមរដូវដូចជា ឈាមជម្ងឺស្ត្រីអាចប្រតិបត្តិសឡាតបាន ដូច្នេះស្ត្រីក៏អាចអនុវត្តិការរួមភេទជាមួយស្វាមីរបស់នាងបានដែរ ពីព្រោះឈាមទាំងពីរមានលក្ខណៈខុសគ្នាទាំងផ្នែករូបភាព និងបញ្ញត្តិច្បាប់។

៙៙៙❋៚៚

## ពូកទី៦

## ឈាមឆ្លងទន្លេ (នីហ្វាស)

**នីហ្វាស** គឺជាឈាមដែលចេញមកតាមស្បូន ដោយមូលហេតុសម្រាលកូន។

ឈាមនេះអាចចេញមកព្រមគ្នា ជាមួយការសម្រាលកូន ឬក្រោយពីការសម្រាលកូនរួច ឬក៏អាចកើតមាន មុនពេលសម្រាលកូនពីរ ឬ បីថ្ងៃ ថែមទាំងមានការ ឈឺចុកចាប់ក្នុងពោះទៀតផង។

សាសនវិទូ ស្ហៃខុលអ៊ីស្លាម អ៊ីបនូតៃមីយ៉ះ បាននិយាយថា៖ *ឈាមដែលធ្លាក់មកពេលចាប់ផ្ដើមឈឺពោះមកនោះ គឺជាឈាមឆ្លងទន្លេ ហើយគេមិនកំណត់រយៈពេលពីរ ឬបីថ្ងៃនោះឡើយ។*

*ការឈឺពោះនេះជាសញ្ញាសម្គាល់ថាស្ត្រីនឹងជិតសម្រាលកូន ប្រសិនបើគ្មានការឈឺចុកចាប់ទេនោះ ពុំមែនជាឈាមឆ្លងទន្លេនោះទេ។*

ក្រុមសាសនវិទូអ៊ីស្លាមមានការខ្វែងយោបល់គ្នាថាតើគួរកំណត់រយៈពេលតិច ឬច្រើន ឬយ៉ាងណា? សាសនវិទូខាងលើ បានបន្ថែមទៀតថា៖ *ឈាមឆ្លងទន្លេនោះ ពុំមានការកំណត់រយៈពេលតិច ឬច្រើននោះឡើយ ។*

ឧទាហរណ៍៖ *ស្ត្រីម្នាក់បានធ្លាក់ឈាមរយៈពេលលើសពី៤០ថ្ងៃ ៦០ថ្ងៃ ឬ៧០ថ្ងៃ ក្រោយមកឈាមនោះក៏បានបាត់ទៅវិញនេះគេហៅថាឈាមឆ្លងទន្លេ ។*

ប៉ុន្តែប្រសិនបើ ឈាមនៅតែបន្តហូរមករហូតនោះ គេកំណត់ឈាមឆ្លងទន្លេត្រឹមតែរយៈពេល៤០ថ្ងៃប៉ុណ្ណោះ ក្រៅពីនេះគេចាត់ទុកវាជាឈាមជម្ងឺ។

***<u>កំណត់សម្គាល់៖</u>***

ប្រសិនបើស្ត្រីម្នាក់ធ្លាប់មានឈាមឆ្លងទន្លេរយៈពេល៤០ថ្ងៃយ៉ាងទៀងទាត់ តែបើក្នុងករណីឈាមនេះធ្លាក់ លើសពីមុន ឬក៏មានសញ្ញាសម្គាល់ថា នាងជិតឈប់ធ្លាក់ឈាម នោះ នាងត្រូវរង់ចាំរហូតដល់ពេលអ បើពុំដូច្នោះទ នាងត្រូវងូតទឹក នៅត្រង់ពេលដែលឈាមធ្លាក់បានចំនួន៤០ ថ្ងៃ ព្រោះនេះជារយៈពេលដែលស្ត្រីភាគ ច្រើនឈប់ធ្លាក់ឈាមលើកលែងតែ ចំពោះស្ត្រីនោះមានរដូវនាងត្រូវរង់ចាំរហូតដល់អស់រដូវក្រោយពីអស់រដូវ ទើបនាងងូតទឹកសំអាតខ្លួន។

តែប្រសិនបើឈាមនៅតែបន្តធ្លាក់មិនឈប់នោះ គេចាត់ទុកវាជាឈាមជម្ងឺហើយត្រូវអនុវត្តឲ្យដូចករណីឈាមជម្ងឺ។ ផ្ទុយទៅវិញ

បើស្ត្រីនោះឈប់ធ្លាក់ឈាម មុនរយៈពេល៤០ ថ្ងៃ នាងត្រូវងូតទឹកសំអាតខ្លួនរួចប្រតិបត្តិសឡាត និងបំពេញនូវករណីកិច្ចផ្សេងៗហើយអាចធ្វើការរួមភេទ ជាមួយស្វាមីរបស់នាងបាន។ លើកលែងការឈប់ធ្លាក់ឈាមនោះមានរយៈពេល តិចជាងមួយថ្ងៃនោះគេមិនចាត់ទុកថាជ្រះស្អាត ហើយក៏មិនអាចធ្វើការរួមភេទជាមួយស្វាមីបាននោះឡើយ។ ប្រសិនបើស្ត្រីនោះរលូតកូនឈាមដែលហូរចេញមកនោះពុំមែនជាឈាមឆ្លងទន្លេនោះទេ តែវាជាឈាមជម្ងឺទៅវិញ។

រយៈពេលតិចបំផុតដែលគេចាត់ទុកគភ៌ក្នុងផ្ទៃ ជាទារកដែលពេញលក្ខណៈជាមនុស្សនោះ គឺរយៈពេល៨០ ថ្ងៃ ហើយតាមធម្មតាគឺរយៈពេល៩០ ថ្ងៃទើបអាចសម្គាល់បានថាទារកនោះពេញលក្ខណៈជាមនុស្សពិតប្រាកដ។

## បញ្ញត្តិច្បាប់នៃឈាមឆ្លងទន្លេ

បញ្ញត្តិច្បាប់ទាក់ទងនឹងឈាមឆ្លងទន្លេ និងឈាមរដូវ មានលក្ខណៈដូចគ្នា លើកលែងតែក្នុងករណីមួយចំនួនតែប៉ុណ្ណោះ៖

១-ការកំណត់រយៈពេលរង់ចាំអ៊ីដឌ្ហះ នៃការលែងលះពុំមែនអាស្រ័យលើឈាមឆ្លងទន្លេទេ។

ប្រសិនបើការលែងលះធ្វើឡើងមុនពេលឆ្លងទន្លេ នោះរយៈពេលរង់ចាំអ៊ីដឌ្ហះ គឺក្រោយពេលសម្រាលកូនរួច។

តែបើការលែងលះនោះធ្វើឡើងក្រោយពេលសម្រាលកូននោះ រយៈពេលរង់ចាំអ៊ីដឌ្ហះ គឺរហូតដល់ឃើញមានរដូវឡើងវិញដូចដែលបាន

រៀបរាប់រួច។
២-ការកំណត់រយៈពេលរង់ចាំអ៊ីដឌ្ឋះក្រោយពីសម្បថអ៊ីឡាក[9](إيلاء) គេមិនកំណត់តាមរយៈឈាមរដូវ ឬឈាមឆ្លងទន្លេឡើយ។ ពេលណាបុរសជាប្តីបានស្បថដូច្នេះ ហើយភរិយាបានទាមទារឲ្យធ្វើការរួមភេទនោះ គេត្រូវកំណត់រយៈពេលសម្រាប់ប្តីបួនខែ ដោយគិតចាប់ពីពេលដែលខ្លួនបានស្បថ រហូតដល់រយៈពេលបួនខែ ទើបគេបង្ខំឲ្យស្វាមីត្រូវជ្រើសរើស ថាតើត្រូវជានាជាមួយប្រពន្ធឡើងវិញ ឬត្រូវលែងលះ។ ប្រសិនបើខ្លួនបានរង់ចាំអស់រយៈពេលបួនខែ រួចក៏ស្រាប់តែប្រពន្ធបានសម្រាលកូន និងមានឈាមឆ្លងទន្លេនោះ ប្តីត្រូវរង់ចាំរយៈពេលបួនខែពីលើនោះបន្ថែមទៀត។ ចំណែកឯឈាមរដូវវិញ គេពុំបានកំណត់ដូចឈាមឆ្លងទន្លេឡើយ។
៣-កត្តាកំណត់ចំពោះស្ត្រីដែលពេញវ័យនោះ គឺដោយសារការមានរដូវ មិនមែនដោយសារការធ្លាក់ឈាមឆ្លងទន្លេនោះឡើយ ព្រោះទាល់តែមានរដូវទើបស្ត្រីអាចបន្តពូជបាន។ ដូច្នេះការគ្រប់អាយុរបស់ស្ត្រី គឺសម្គាល់នៅត្រង់ស្ត្រីនោះមានរដូវ។
៤-ឈាមរដូវមានពេលរបស់វា ដែលនឹងកើតមានចំពោះស្ត្រីក្នុងពេលវេលាទៀងទាត់។ ឧទាហរណ៍ថា ស្ត្រីដែលធ្លាប់មានរដូវរយៈពេល ៨ថ្ងៃ ស្រាប់តែពេលមួយនោះមានតែរយៈពេល៤ថ្ងៃក៏បាត់ទៅវិញ

[9] –អ៊ីឡាកជាពាក្យសម្បថដែលប្តីបានស្បថចំពោះអល់ឡោះថា ខ្លួននឹងមិនធ្វើការរួមភេទជាមួយប្រពន្ធខ្លួនជាដាច់ខាត ឬរយៈពេលលើសពីបួនខែ។

ក្នុងរយៈពេលពីរថ្ងៃក្រោយមក នាងក៏មានរដូវឡើងវិញក្នុងថ្ងៃទី៧ និងទី៨។ ពីរថ្ងៃចុងក្រោយនេះក៏គេចាត់ទុកថាជាឈាមរដូវដែរ។ ចំណែកឈាមឆ្លងទន្លេវិញ ប្រសិនបើស្ត្រីនោះអស់មុនគម្រប់៤០ថ្ងៃហើយ ស្រាប់តែឃើញឡើងវិញ ក្នុងកំឡុងរយៈពេល៤០ថ្ងៃដដែលនោះគេចាត់ទុកថាវាជាឈាមជម្ងឺ ហើយនាងត្រូវប្រតិបត្តិសឡាត និងប្រតិបត្តិការតព្វកិច្ចផ្សេងៗទៀត។ ផ្ទុយទៅវិញ ប្រសិនបើពិនិត្យទៅឃើញថា វាជាឈាមរដូវនោះ នាងត្រូវអនុវត្តតាមករណីឈាមរដូវវិញនេះជាការអនុវត្តតាមនិកាយ អ៊ីម៉ាំហាំពើលី ។ ជាមួយនេះមានសាសនវិទូមួយចំនួនបានចាត់ទុកឈាមដែលធ្លាក់មកវិញក្រោយពេ លរាំងមួយរយៈនោះជាឈាមឆ្លងទន្លេ លើកលែងតែឈាមដែលធ្លាក់របៀតមិនឈប់នោះគេចាត់ទុកវាជាឈាមជម្ងឺទៅវិញ។

ដូចដែលមានសរសេរនៅក្នុងសៀវភៅអាល់មូហ្គនី (المغني) ស្តីអំពីមេនិកាយអ៊ីម៉ាំម៉ាលិក ដែលបានលើកឡើងថា៖ *ចំពោះស្ត្រីដែលបានឃើញឈាមបន្ទាប់ពីរាំងរយៈពេលពីរ ឬបីថ្ងៃនោះ ក៏ជាឈាមឆ្លងទន្លេដែរ។បើពុំដូច្នោះទេ គឺជាឈាមរដូវ នេះក៏ជាទិសដៅដែលសាសនវិទូស្ហៃខុលអ៊ីស្លាមអ៊ិបនូតៃមីយ៉ះប្រកាន់យកផងដែរ* ។ តាមពិតគ្មានឈាមណាមួយដែលមានលក្ខណៈគួរឲ្យសង្ស័យនោះទេ តែចំនុចដែលស្មុគស្មាញនោះ គឺជារឿងបន្ទាប់បន្សំជាគំនិតទស្សនៈ និងមតិយោបល់របស់សាសនវិទូប៉ុណ្ណោះ។ ចំណែកអាល់គួរអាន និងស៊ុណ្ណះរបស់ណាពីមូហាំម៉ាត់គឺបានបកស្រាយយ៉ាងក្បោះក្បាយអំពីបញ្ហាទាំងនេះ។ អល់ឡោះមិនដាក់កាតព្វកិច្ចទៅលើបុគ្គលណាម្នាក់ឲ្យបួសឬដើរជុំវិញកាក់ពួះពីរដងនោះទេ លើកលែងតែបុគ្គល

នោះធ្វើមិនបានគ្រប់លក្ខណៈ ទើបតម្រូវឲ្យបំពេញឡើងវិញ។ ទ្រង់មេត្តា ករុណា សណ្ដោសប្រណីណាស់ ទ្រង់មិនដាក់កាតព្វកិច្ចលើខ្ញុំបម្រើរបស់ទ្រង់ ហួតដល់ថ្នាក់ពួកគេធ្វើមិនកើតនោះទេ។ ដូចដែលទ្រង់បានមានបន្ទូលថា៖

**قال تعالى: (لاَ يُكَلِّفُ اللهُ نَفْسًا إِلاَّ وُسْعَهَا)**

سورة البقرة 286

---

<u>មានន័យថា៖</u> *អល់ឡោះមិនដាក់កាតព្វកិច្ចឲ្យលើសពីសមត្ថភាពមនុស្សដែលអាចធ្វើបាននោះឡើយ ។*

ទ្រង់បានមានបន្ទូលទៀតថា៖

**قال تعالى: (فَاتَّقُوا اللهَ مَا اسْتَطَعْتُمْ)** سورة التغابن 16

<u>មានន័យថា៖</u> *ចូរពួកអ្នកកោតខ្លាចអល់ឡោះ តាមលទ្ធភាពដែលអាចធ្វើទៅបាន ។*

ទាក់ទងនឹងឈាមរដូវ

ប្រសិនបើឈាមនោះឈប់ធ្លាក់មុនរយៈពេលដែលធ្លាប់មានរដូវក្នុងករណីនេះ គេអនុញ្ញាតឲ្យប្ដីអាចធ្វើការរួមភេទ ជាមួយប្រពន្ធរបស់ខ្លួនបាន។ ចំណែកឈាមឆ្លងទន្លេវិញ ប្រសិនបើឈាមនោះឈប់ធ្លាក់មុនរយៈពេល៤០ថ្ងៃ ពុំមែនជាការគាប់ប្រសើរចំពោះស្វាមី ដែលចង់ធ្វើការរួមភេទជាមួយប្រពន្ធរបស់ខ្លួននោះទេ។ នេះជាទស្សនៈរបស់មេនិកាយអ៊ីម៉ាអះម៉ាត់ ហាំព្វាល់។

តែតាមពិតនោះ បើទោះបីជាប្ដីនោះធ្វើការរួមភេទជាមួយប្រពន្ធរបស់ខ្លួនក៏មិនមានបញ្ហាអ្វីកើតឡើងនោះដែរ។

៙៙៙❈៙៙

## ជំពូកទី៧

## បញ្ញត្តិច្បាប់ទាក់ទងនឹងការប្រើវិធីទប់ស្កាត់ ឬការធ្វើឲ្យឆាប់មានរដូវ

## ភាពទៀងរកំណើត និងរូបភាពនៃការយកកូនចេញ

ស្ត្រីដែលអាចប្រើប្រាស់វិធីធ្វើឲ្យរាំងរដូវមានល័ក្ខខ័ណ្ឌពីរយ៉ាង៖

**ល័ក្ខខ័ណ្ឌទី១**: ការប្រើវិធីនេះមិនមានផលប៉ះពាល់ និងគ្រោះថ្នាក់ដល់សុខភាព ប្រសិនបើខ្លាចមានគ្រោះថ្នាក់ពុំអាចប្រើប្រាស់វិធីនេះបានឡើយ។ ដូចជាអល់ឡោះបានមានបន្ទូល៖

**قال تعالى: (وَلاَ تُلْقُواْ بِأَيْدِيْكُمْ إِلىَ التَّهْلُكَةِ)**

سورة البقرة 195

<u>មានន័យថា:</u> *ចូរពួកអ្នកកុំធ្វើឲ្យខ្លួនឯង ធ្លាក់ក្នុងភាពមហន្តរាយឲ្យសោះ។*

ទ្រង់បានមានបន្ទូលទៀតថា៖

**قال تعالى:(وَلاَ تَقْتُلُواْ أَنْفُسَكُمْ إِنَّ اللهَ كَانَ بِكُمْ رَحِيْمًا)**سورة النساء 29

មានន័យថា៖ *ហើយចូរពួកអ្នកកុំសម្លាប់ខ្លួនឯង ពិតប្រាកដ អល់ឡោះ អានិតស្រឡាញ់ពួកអ្នក ។*

**ល័ក្ខខ័ណ្ឌទី២**: ត្រូវមានការអនុញ្ញាតពីប្តី ។ ឧទាហរណ៍ថា ស្ត្រីម្នាក់កំពុងរង់ចាំរយៈពេលអ៊ីដខ្ទះពីការលែងលះ ក្នុងពេលនេះប្តីត្រូវទទួលខុសត្រូវផ្គត់ផ្គង់ ចំពោះប្រពន្ធលើការស្នាក់នៅ ចំណីអាហារ និងសម្លៀកបំពាក់ជាដើម។

ដោយឆ្លៀតឱកាសដើម្បីទទួលបានការផ្គត់ផ្គង់ពីប្តី ស្ត្រីបានប្រើប្រាស់វិធីពន្យារ

ឬទប់ស្កាត់រដូវក្នុងគោលបំណងពន្យារពេលឲ្យបានយូរ។

ក្នុងករណីនេះ គេមិនអនុញ្ញាតឲ្យស្ត្រីប្រើប្រាស់វិធីពន្យារការមានរដូវនោះឡើយ លុះត្រាតែមានការឯកភាពពីប្តី។

ម្យ៉ាងវិញទៀតបើការប្រើប្រាស់វិធីទប់ស្កាត់ការមានរដូវអាចបង្កឲ្យគ្មានផ្ទៃពោះនោះ ក៏ចាំបាច់ត្រូវតែមានការអនុញ្ញាតពីប្តីផងដែរ។ ស្ត្រីគ្រប់រូបគួរជៀសវាងពីការប្រើប្រាស់វិធីបែបនេះ ព្រោះវាជាការប្រសើរ លើកលែងតែក្នុងករណីចាំបាច់បំផុត និងខានមិនបាន។

៙៙✵៙៙

ការប្រើប្រាស់វិធីឲ្យឆាប់មានរដូវត្រូវមានល័ក្ខខ័ណ្ឌពីរជាចាំបាច់៖

លក្ខខ័ណ្ឌ**ទី១**: គេមិនអនុញ្ញាតឲ្យស្ត្រីប្រើប្រាស់វិធីនេះក្នុងបំណងរួចផុតពីកាតព្វកិច្ច។ ឧទាហរណ៍ថា: ស្ត្រីម្នាក់ប្រើប្រាស់វិធីនេះ ពេលជិតចូលខែបួស ក្នុងគោលបំណងរួចផុតពីកាតព្វកិច្ច បួស ឬ

ដោយសារខ្ជិលប្រតិបត្តិសម្បាត ឬដើម្បីគេចពីការបំពេញករណីកិច្ចផ្សេងៗទៀត។

លក្ខខ័ណ្ឌ**ទី២**: ត្រូវមានការអនុញ្ញាតពីប្តីជាមុនសិនដោយមូលហេតុថា ពេលស្ត្រីមានរដូវ ប្តីមិនអាចធ្វើការរួមភេទជាមួយនាងបានទេ។

អ៊ីស្លាមមិនអនុញ្ញាតឲ្យស្ត្រីធ្វើអ្វីមួយ ដែលប៉ះពាល់ដល់សិទ្ធិប្តីលុះត្រាតែមានការឯកភាពពីប្តី
ទើបអាចធ្វើទៅបានទោះបីជាប្រពន្ធស្ថិត
ក្នុងរយៈពេលរង់ចាំអ៊ីដឌ្ហះក៏ដោយចុះ។

៙៙❋៙៙

## វិធីពន្យាកំណើតមានពីរបែប

### ១-ការប្រើវិធីពន្យារកំណើតមិនឲ្យមានកូនរហូត

ការប្រើប្រាស់វិធីពន្យារកំណើតបែបនេះ ត្រូវច្បាប់ហាមឃាត់ជាដាច់ខាតព្រោះវាអាចនាំឲ្យចំនួនមនុស្សថយចុះដែលផ្ទុយនឹងច្បាប់អ៊ីស្លាមដែលចង់ឲ្យមានប្រជាជាតិរបស់ខ្លួនកាន់តែច្រើន។ ផ្ទុយទៅវិញ ប្រសិនបើមានកូនតិចពេក ចៃដន្យកូននោះស្លាប់ វានឹងប្រឈមមុខចំពោះការបាត់បង់ពូជពង្ស។

### ២-ការប្រើវិធីពន្យារកំណើតបណ្តោះអាសន្ន

ឧទាហរណ៍ថាស្ត្រីម្នាក់មានកូនញឹកពេក ដែលធ្វើឲ្យមានការលំបាកក្នុងការថែទាំហើយនាងមានបំណងចង់ពន្យារកំណើត ដើម្បីជៀសវាងពីការមានកូនច្រើន។

ក្នុងករណីនេះអ៊ីស្លាមបានអនុញ្ញាតដោយមានល័ក្ខខ័ណ្ឌចាំបាច់ពីរ គឺត្រូវមានការឯកភាពពីប្តី និងមិនប៉ះពាល់ ដល់សុខភាពរបស់នាង។អំណះអំណាងអំពីការអនុញ្ញាតនេះ គឺពួកសាវ័ករបស់ណាពីមូហាំម៉ាត់ តែងប្រើវិធីបញ្ចេញទឹកកាមមកក្រៅ ប្រដាប់ភេទរបស់ស្ត្រី ដើម្បីកុំឲ្យប្រពន្ធរបស់ពួកគេមានផ្ទៃពោះ។ ពេលដែលពួកគេធ្វើដូច្នេះពុំមានច្បាប់ណាហាមឃាត់ពួកគេឡើយ

៙៙❋៙៙

## ការយកកូនចេញ

ការយកកូនចេញអាចប្រព្រឹត្តទៅតាមរយៈរូបភាពពីរយ៉ាង៖

### ១-ការយកកូនចេញដើម្បីបំផ្លាញចោល (ពន្លូតកូនចោល)

ការយកកូនចេញដើម្បីបំផ្លាញចោល ប្រសិនបើធ្វើឡើងក្រោយពេលដែលអល់ឡោះបានដាក់ជីវិតចូលទៅក្នុងទារករួចនោះ គឺជាទង្វើមួយត្រូវបានគេហាមឃាត់ដាច់ខាត ពីព្រោះនេះជាការសម្លាប់ជីវិតមួយដែលច្បាប់បានហាមប្រាមដាច់ខាត ដោយមានបញ្ជាក់ទាំងក្នុងបន្ទូលរបស់អល់ឡោះ និងប្រសាសន៍របស់ណាពីមូហាំម៉ាត់ ហើយវាក៏ជាទស្សនទូទៅរបស់សាសនវិទូគ្រប់ៗរូបផងដែរ។ ផ្ទុយទៅវិញ ប្រសិនបើពន្លូតកូនមុនពេលដែលអល់ឡោះបានដាក់

ជីវិតចូលទៅក្នុងទារកនោះ គឺមានការខ្វែងគំនិតគ្នា ក្នុងចំណោមពួកសាសនវិទូអ៊ីស្លាមថាតើគួរមានការអនុញ្ញាត ឬយ៉ាងណា?

សាសនវិទូមួយចំនួនទៀតបានអះអាងថា គេអនុញ្ញាតឲ្យពន្លូតកូនមុនពេលគភ៌នោះក្លាយជាដុំឈាម (ﻋﻠﻘﺔ) ពោលគឺមិនទាន់ហួសពីរយៈពេល៤០ ថ្ងៃ។ សាសនវិទូមួយចំនួនផ្សេងទៀតបានអះអាងថា គេអនុញ្ញាតឲ្យពន្លូត បើសិនជាគភ៌នោះមិនទាន់បង្ករូបរាងជា ទារកពេញលក្ខណៈនៅឡើយ។ ជាការប្រសើរគឺមិនត្រូវពន្លូតកូនទេ លើកលែងតែមានករណីចាំបាច់ខ្លាំង

ដូចជាម្តាយមានជម្ងឺរុំារ៉ៃមិនអាចពរពោះបាន ឬមានលក្ខណៈប្របហាក់ប្របហែលនេះ។ ក្នុងករណីនេះ ច្បាប់អ៊ីស្លាមបាន អនុញ្ញាតឲ្យពន្លូតប៉ុន្តែបើទារកនោះពេញរូបពេញរាង មានលក្ខណៈជាមនុស្សទៅហើយនោះ ច្បាប់ហាមពន្លូតកូននោះជាដាច់ខាត។

**២-ការយកកូនចេញដើម្បីសង្គ្រោះ៖**

ការយកកូនចេញដើម្បីសង្គ្រោះ មានដូចជាការយកកូនចេញមុនពេលជិតសម្រាលកូន។ ក្នុងករណីនេះ ច្បាប់បានអនុញ្ញាតឲ្យយកកូនចេញ ដើម្បីសង្គ្រោះដោយមានលក្ខ័ណ្ឌពីរ គ្រោះថ្នាក់ដល់ម្តាយ និងកូន ហើយនិងមិនឈានដល់ការវះកាត់។

**ករណីត្រូវធ្វើការវះកាត់មានល័ក្ខខ័ណ្ឌបួនយ៉ាង៖**

១-ម្តាយ និងទារកនៅមានជីវិត មិនត្រូវធ្វើការវះកាត់ឡើយ លើកលែងតែមានការចាំបាច់បំផុត ដូចជាម្តាយមានការលំបាកខ្លាំងក្នុងការសម្រាលកូន។ ករណីនេះ ច្បាប់អនុញ្ញាតឲ្យធ្វើការវះកាត់ ព្រោះយើងដឹងហើយថាជិវិតមនុស្ស ជាបញ្ញើរបស់អល់ឡោះជាម្ចាស់មក

លើមនុស្សលោក។ ដូច្នេះ យើងមិនត្រូវធ្វើអ្វីមួយប៉ះពាល់ដល់ពួកគេ និងត្រូវគិតពីប្រយោជន៍ចម្បងមិនត្រូវធ្វេសប្រហែស លើកលែងតែគ្រោះថ្នាក់ដែលយើង នឹកស្មានមិនដល់ជាយថាហេតុប៉ុណ្ណោះ។

២- ម្តាយ និងទារកបានបាត់បង់ជីវិតទៅហើយ នោះច្បាប់មិនអនុញ្ញាតឲ្យធ្វើការវះកាត់យកទារកចេញទេ ព្រោះការធ្វើបែបនេះពុំមានផលប្រយោជន៍អ្វីឡើយ។

៣-ប្រសិនបើទារកស្លាប់ក្នុងផ្ទៃម្តាយដែលនៅរស់ ច្បាប់អុញ្ញាតឲ្យធ្វើការវះកាត់យកទារកនោះចេញមកក្រៅ បើពុំដូច្នោះទេ វានឹងធ្វើឲ្យមានគ្រោះថ្នាក់ដល់ម្តាយព្រោះទារកស្លាប់មិនអាចសម្រាលចេញមកក្រៅបានឡើយ។

៤-ម្តាយស្លាប់ តែទារកនៅមានជីវិតរស់ក្នុងផ្ទៃម្តាយ។ ករណីនេះ ប្រសិនបើគេគ្មានសង្ឃឹមថា ទារកនោះនឹងរស់រានមានជីវិតទេនោះ ច្បាប់ហាមធ្វើការវះកាត់ម្តាយដែលបានស្លាប់នោះ។ ប៉ុន្តែបើនៅមានសង្ឃឹមថាទារកនោះអាចរស់រានមានជីវិត ដូចជាសម្រាលចេញបានពាក់កណ្តាលច្បាប់អនុញ្ញាតឲ្យធ្វើការវះកាត់ម្តាយនោះ ដើម្បីយកទារកនោះចេញមកក្រៅ។ ដោយឡែកប្រសិនបើម្តាយនោះមិនទាន់សម្រាលសោះ ហើយបានស្លាប់បាត់ទៅ ច្បាប់មិនអនុញ្ញាតឲ្យ ធ្វើការវះកាត់ម្តាយដែលស្លាប់នោះទេ ព្រោះវាជាការធ្វើទារុណកម្មលើសពម្តាយនោះ តែបើគ្មានជម្រើសដើម្បីយកទារកចេញក្រៅទេ គឺច្បាប់អនុញ្ញាតឲ្យធ្វើការវះកាត់។ នេះជាជម្រើសរបស់សាសនវិទូអ៊ីបនូ ហ៊ាំព្វែរ៉េះ ដែលបានសរសេរបញ្ជាក់ច្បាស់ពីរឿងនេះ

នៅក្នុងសៀវភៅអាល់អ៊ីនស្វហ្វ (الإنصاف)
និងជាជម្រើសមួយដ៏ប្រសើរផងដែរ។

**កំណត់សម្គាល់:**

ពេលបច្ចុប្បន្ននេះ ការវះកាត់ពុំបណ្តាលឲ្យមានការលំបាកដល់ម្តាយឡើយ ព្រោះក្រោយការវះកាត់គេអាចដេរភ្ជិតវិញបានតាក្បួនវេជ្ជសាស្ត្រទំនើប។ ដោយហេតុថាភាពថ្លៃថ្នូររបស់អ្នករស់ធំជាងអ្នកស្លាប់ ការសង្គ្រោះជីវិតមនុស្សពីមហន្តរាយ គឺជាការចាំបាច់ និងបន្ទាន់ផងដែរ។

**សេចក្តីសង្កេត:**

គ្រប់វិធី និងរូបភាពទាំងអស់ដែលអនុញ្ញាតឲ្យយកកូនចេញដូចបានរៀបរាប់រួចមកហើយនេះ ចាំបាច់ត្រូវមានការឯកភាពពីប្តីជាមុនសិន។ ពាក់ព័ន្ធនឹងខ្លឹមសារទាំងនេះ យើងខ្ញុំគ្រាន់តែបញ្ជាក់ពីចំនុចគោលៗតែប៉ុណ្ណោះ ដោយពុំបានលំអិតសេចក្តីនិងស៊ីជម្រៅនោះទេ ព្រោះរឿងដែលទាក់ទងនឹងស្ត្រីភេទនោះ មានវិសាលភាពធំធេងណាស់ មិនអាចរៀបរាប់ឲ្យអស់សេចក្តីបានឡើយ ។ ចំពោះអ្នកដែលបកស្រាយពីច្បាប់ណាមួយគេត្រូវដឹងថាខ្លួនកំពុងស្ថិតក្នុងក្របខណ្ឌនៃសាសនាអ៊ីស្លាម ពោលគឺខ្លួនកំពុងរកដំណោះស្រាយរឿងជាក់ស្តែងសម្រាប់សង្គមមនុស្សក្នុងបុព្វហេតុរបស់អល់ឡោះ ហើយក៏ជាអ្នកទទួលខុសត្រូវចំពោះអ្វីដែលមាននៅក្នុងអាល់គួរអាន និងស៊ុណ្ណះរបស់ណាពីមូហាំម៉ាត់ផងដែរ។ ព្រោះអាល់គួរអាន និង

ស៊ុណ្ណះណាពីមូហាំម៉ាត់ជាមូលដ្ឋានគ្រឹះ និងជាឱវាទដែលតម្រូវឲ្យសាសនិកអ៊ីស្លាមសិក្សាស្វែងយល់ ឲ្យស៊ីជម្រៅនិងអនុវត្តតាមច្បាប់គ្រឹះទាំងពីរនេះ។ ដោយឡែក គ្រប់ទង្វើទាំងឡាយដែលផ្ទុយនឹងអាល់គួរអាន និងស៊ុណ្ណះរបស់ណាពីមូហាំម៉ាត់ គឺត្រូវចាត់ទុកជាមោឃៈ ហើយយើងពុំត្រូវអនុវត្តតាមទង្វើអកុសលទាំងនោះឡើយ លើសពីនេះទៅទៀត អ្នកដែលបកស្រាយច្បាប់ចាំបាច់ត្រូវមានភាពស្មោះត្រង់ ប្រកាន់នូវជំហរសច្ចភាពចំពោះអល់ឡោះ ត្រូវសុំជំនួយពីទ្រង់ចំពោះរឿងហេតុទាំងឡាយដែលខ្លួនបាន និងកំពុងជួបប្រទះ ហើយសុំឲ្យទ្រង់ប្រទាននូវ ចំណេះដឹងដ៏សុក្រឹត ចម្លើយត្រឹមត្រូវតាមការប្រៀនប្រដៅរបស់ទ្រង់។

កត្តាចាំបាច់មួយទៀត គឺឯកសារយោង និងអណះអំណាងដ៏សុក្រឹតត្រូវអនុលោមតាមអាល់គួរអាន និងស៊ុណ្ណះរបស់ណាពីមូហាំម៉ាត់។ ត្រូវស្វែងយល់ និងរិះរកគ្រប់មធ្យោបាយក្នុងការស្រាវជ្រាវ ដោយផ្អែកលើពាក្យពេចន៍ មតិ យោបល់ ទស្សនៈរបស់ក្រុមសាសនវិទូអ៊ីស្លាម ដើម្បីឲ្យយល់កាន់តែច្បាស់ និងទូលំទូលាយ ទាំងអត្ថន័យដែលមាននៅក្នុងអាល់គួរអាននិងស៊ុណ្ណះរបស់ណាពីមូហាំម៉ាត់។

ជួនកាលមតិ និងទស្សនៈរបស់ក្រុមសាសនវិទូអ៊ីស្លាមខ្លះ ពុំបានឆ្លុះបញ្ចាំងទូលំទូលាយ ឬផ្តោតលើបញ្ហាទាំងនោះឡើយ តែបើពួកគេត្រលប់ទៅមើលខ្លឹមសារក្នុងអាល់គួរអាន និងស៊ុណ្ណះរបស់ណាពីមូហាំម៉ាត់វិញពួកគេច្បាស់ជាឃើញការបកស្រាយយ៉ាងក្បោះក្បាយអំ ពីបញ្ហាទាំងនេះ។ ទាំងនេះគឺអាស្រ័យទៅលើភាពស្មោះត្រង់ សច្ចភាព សមត្ថភាពយល់ដឹងរបស់អ្នកបកស្រាយច្បាប់សាសនា

អ៊ីស្លាមប៉ុណ្ណោះ។
អ្នកបកស្រាយច្បាប់ត្រូវទទួលស្គាល់ដែនសមត្ថភាពរបស់ខ្លួន ក្នុងការបកស្រាយច្បាប់ចំពោះករណីណាមួយដែលខ្លួនមិនយល់ច្បាស់ និងស្រពេចស្រពិលនោះមិនត្រូវបកស្រាយទាំងប្រថុយប្រថាននោះឡើយ។

មានអ្នកបកស្រាយច្បាប់ជាច្រើនដែលមានការធ្វេសប្រហែសបកស្រាយទាំងប្រញាប់ប្រញាល់មិនមានគោលការណ៍ជាក់លាក់។ ដូច្នេះពេលពួកគាត់ត្រលប់ទៅមើលខាងក្រោយវិញ ទើបឃើញថាការបកស្រាយរបស់ពួកគាត់មានកំហុសឆ្គងច្រើន និងមានការស្ដាយក្រោយ។ នៅពេលណាអ្នកអាន អ្នកសិក្សា អ្នកស្ដាប់មើលទៅឃើញថាអ្នកបកស្រាយនោះនិយាយ និងលើកឡើងដោយមានអំណះអំណាងច្បាស់លាស់ មានហេតុផល និងមានការប្រឹងប្រែងស្វះស្វែងក្នុងការបកស្រាយលើបញ្ហាអ្វីមួយនោះគេនឹងមានទំនុកចិត្ត និងមានការជឿជាក់ចំពោះការបកស្រាយរបស់ពួកគាត់។ តែបើអ្នកបកស្រាយនោះមានភាពប្រញាប់ប្រញាល់ ខ្វះខ្នាយ មិនមានអំណះអំណាងច្បាស់លាស់ និងគ្មានហេតុផលទេនោះ មនុស្សទូទៅពិតជាមិនជឿជាក់ចំពោះការបកស្រាយរបស់ពួកគាត់ឡើយ។ ដូច្នេះភាពប្រញាប់ប្រញាល់ និងការមានកំហុសឆ្គងច្រើន ជាគុណវិបត្តិដែលជារនាំងរាំងខ្លួនឯង និងអ្នកដ៏ទៃពីធាតុពិតនៃខ្លឹមសារដែលមាននៅក្នុងអាល់គួរអាន និងស៊ុណ្ណះរបស់ណាពីមូហាំម៉ាត់។

យើងខ្ញុំសូមបួងសួង សុំអំពីអល់ឡោះជាម្ចាស់ សូមទ្រង់មេត្តាប្រោសប្រទានដល់យើងខ្ញុំ និងមិត្តអ្នកអានទាំងឡាយ ទទួលបាននូវពរជ័យការចង្អុលបង្ហាញទៅរកមាគ៌ាដ៏ត្រឹមត្រូវនិងសុច្ចរិតភាពទាំងក្នុងលោក និងបរលោក។

نسأل الله تعالى أن يهدينا وإخواننا المسلمين صراطه المسطقيم، وأن يوفقنا لما يحبه ويرضاه من القول والعمل وصلى الله وسلم على نبينا محمد وعلى آله وصحبه أجمعين وآخر دعوانا الحمد لله رب العالمين.



មាតិការអត្ថបទ

**ជំពូកទី១** **ទំព័រ**

ជំពូកទី២



ជំពូកទី៣



ជំពូកទី៤



ជំពូកទី៥



ជំពូកទី៦



ជំពូកទី៧



ឱអល់ឡោះជាម្ចាស !

សូមទ្រង់កែតំរូវស្រ្តីទាំងឡាយ អោយក្លាយជាកែវភ្នែក ជាទីស្រលាញ់របស់ស្វាមី និងបុត្រាបុត្រីរបស់ពួកគេ និងផ្តល់ភាពត្រឹមត្រូវដល់អ្នកជុំវិញខ្លួនគេ។

ឱព្រះជាម្ចាស់! សូមអោយពួកគេទទួលបាននូវភាពស្មោះត្រង់ និង ភាពខ្មាស់អៀន និងបញ្ចៀសអំពីការបង្ករបញ្ហាច្របូកច្របល់ដោយពូកគេ។

រៀបចំដោយគណៈកម្មការបកប្រែនិងបោះពុម្ពសៀវភៅ
នៃសមាគមសម្របសម្រួលសង្គមនៃប្រទេសគុយវែត
សហការជាមួយសមាគមសប្បុរសធម៌ដើម្បីអភិវឌ្ឍកម្ពុជា
2012